KhmerPost USA
សារព័ត៌មាន ខ្មែរផុស ស.រ.អា

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Issue 153 May 09th -22nd, 2014

Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# ទិវាមាតា
# Mother's Day

**ដោយ : ពិន សំខុន**

ថ្ងៃទី១១ឧសភា ២០១៣ ជាថ្ងៃប្រារព្ធ "ទិវាមាតា"មិនមែនជាថ្ងៃឈប់សម្រាកទេ តែជាថ្ងៃសម្រាប់




ពិចារណារួមគ្នាប្រចាំឆ្នាំឧទ្ទិសទៅដល់ស្ត្រីជាមាតាក្នុងពិភពលោកជាពិសេសផ្តើមពីស្ត្រីជាមាតាដែលនៅក្បែរយើងបំផុតថា "តើយើងបានធ្វើអ្វីខ្លះហើយសម្រាប់នារីជាស្ត្រីហើយជាម្តាយម្នាក់នោះហើយឬនៅ?" វប្បធម៌នៃប្រទេសអាមេរិកនេះ "សីលធម៌" គេគោរពស្ត្រីខ្លាំងណាស់ គេថែម **តទៅទំព័រទី ០៩**

# ទិវាកេរ្តិ៍ដំណែលវប្បធម៌ អាស៊ីប៉ាស៊ីហ្វិក នៅឡូវែល

**ដោយ : ពិន សំខុន**

ភ្ញៀវជាង៣៥០នាក់បានអញ្ជើញមកចូលរួមក្នុងរាត្រីសមោសរដែលមានឈ្មោះថា "ទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក" ដែលរៀបចំឡើងដោយសារព័ត៌មានខ្មែរផុស នារាត្រីថ្ងៃសុក្រទី ២ ឧសភា២០១៤ ចាប់ពីម៉ោង៦.៣០ រហូតដល់ **តទៅទំព័រទី ០៣**

# KHMER POST USA GALA CELEBRATION

**BY RICHARD HOWE, JR.**
**HTTP://WWW.RICHARDHOWE.COM/2014/05/03/KHMER-POST-USA-GALA-CELEBRATION/**

Nearly 300 people gathered last night at a community celebration of Asian American and Pacific Islander Heritage Month sponsored by the Khmer Post USA, the Lowell-based Cambodian language newspaper that has circulation throughout New England and the mid-Atlantic states. Held at the Hong Kong Restaurant at 308 Westford Street in the heart of Cupples Square, the keynote speaker was the Honorable Sichan Siv,

**Continued to page 05**


Mayor Elliott presenting Key to City to Ambassador Siv

# ចូលឆ្នាំខ្មែរនៅលីន

(Cambodian New Year at Lynn-MA)

ប្រជាពលរដ្ឋប្រមាណជា១ពាន់នាក់ នៅតំបន់ លីន បានមកជួបជុំគ្នានៅទីលានមុខសាលាក្រុងខ្លួន ដើម្បីប្រារព្ធពិធីបុណ្យចូលឆ្នាំមមី ២៥៥៨ នាថ្ងៃសៅរ៍ ៣ ឧសភា២០១៤ យឺតពេលបន្តិចមែនតែនៅតែអ៊ូអរ ដោយមានការលក់ដូរវត្ថុអានុស្សាវរីយចំណីចំណុករបៀបខ្មែរនឹងមានសំដែងសិល្បៈនានាជូនកំសាន្ត តាំងពីព្រឹករហូតដល់ល្ងាចទៀតផង ។

លោក ស៊ីច័ន្ទ ស៊ីវ មន្ត្រីជាន់ខ្ពស់នៃសេដ្ឋវិមាននៃរដ្ឋបាលប្រធានាធិបតី **តទៅទំព័រទី ១១**



ទំព័រសេដ្ឋកិច្ច

# "សាំភ្លីខ្មែរ"និង"ខ្មែរផុសស.រ.អា."ជាប់ឈ្មោះជាជម្រើសពាណិជ្ជករឆ្នាំ២០១៤

ពាណិជ្ជករខ្មែរ២ក្រុមនៅឡូវែលបានត្រូវជាប់ឈ្មោះជាជម្រើសពាណិជ្ជករអន្តោប្រវេសន៍ប្រចាំឆ្នាំ២០១៤ របស់ Immigrant Entrepreneur Award នារដ្ឋម៉ាសាឈូសែត គឺ "សាំភ្លីខ្មែរ"និង"ខ្មែរផុសស.រ.អា." ដែលពានរង្វាន់នឹងត្រូវប្រកាសនៅថ្ងៃទី៨ឧសភា២០១៤នេះ នៅខាំប្រិជ-បូស្តុន។

អង្គការ Immigrant Entrepreneur ជាអង្គការមិនយកកំរៃដ៏សំខាន់មួយដែលមានភារកិច្ចជួយលើកទឹកចិត្តជនអន្តោប្រវេសន៍ដល់ការខិតខំប្រឹងប្រែងក្នុងកាងារសេដ្ឋកិច្ចពាណិជ្ជកម្ម ឬស្រាវជ្រាវវិទ្យាសាស្ត្រឱ្យជោគជ័យ ហើយថែមទាំងបង្កើតចំណង់រកស៊ីជាមុខរបរដល់អ្នកដ៏ទៃទៀតផង ។ ឆ្នាំនេះពាណិជ្ជករជម្រើសមាន៣៩ក្រុម ចែកជា៤ប្រភេទ ហើយជ័យលាភីក៏មាន៤ក្រុមសម្រាប់ប្រភេទនីមួយៗដែរ ។ ក្រុមខ្មែរយើងទាំង២ក្រុមស្ថិតនៅក្នុងប្រភេទពាណិជ្ជកម្មខ្នាតតូច ឬពាណិជ្ជកម្មក្នុងភូមិ។




នារាត្រីថ្ងៃទី៨នេះ ភ្ញៀវសំខាន់ៗជាង **តទៅទំព័រទី ១១**

# Very Special Thanks to...

## KhmerPost USA 4th Annual Media and Community Gala Corporate Sponors



















Senior Care Options

## *Table Sponsors*

*Angkor Dance Troupe, Cambodian Mutual Assistant Association of Greater Lowell, Cambodian National Rescue Party of Lowell, Cambodian National Rescue Party of Worcester, Cambodia Town of Lowell, Elder Services of North Shore, Global Realty, Khmer Cultural Council, MealeaPolcari, United Khmer Foundation, Connecticut*

*…more thanks…*

*Businesses and Community Supports: Cambodian Fashion Shows is sponsored by Thidasour Cambodia Bridal, Laotian Dance Group is brought to you by Summer Cultural School Buddha Pahvana Temple, "Muy Thai Dance" by Thai Community, Interior Decors by Event Co-Ordinator and Creator.*

*Thank you all volunteers and models who helped making this night possible.*

*KhmerPost USA*
*45 Merrimack Street. Suite 218A. Lowell, MA 01852.*
*Tel: 978-677-7163. Fax: 978-677-7092.*
*www.khmerpostusa.com | info@khmerpost.us*

Roger Pin, Bill Samaras, Rithy Uong, Rodney Elliott, Soben Pin, Ambassador Siv, Corey Belanger, Rita Mercier, Dave Conway

តមកពីទំព័រទី ១

## ទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក...

អាប្រាតនៅ "ក្រុងខ្មែរ"នាភោជនីយដ្ឋាន "ហុងកុង"៣១៨ ផ្លូវវៃសហ្វិត ក្រុងឡូវែលបានធ្វើឱ្យឡូវែលក្លាយជាក្រុងដែលប្តើមប្រារព្ធជាលើកដំបូងបង្អស់បុណ្យជាតិអាមេរិកាំងស្តីពីការទទួលស្គាល់កេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិកនេះ ។ រាត្រីសមោសរដែលមានន័យលើកតម្កើងរួមជាភ្ញៀវកិត្តិយសក្នុងពិធីដ៏មហោឡារិកផងដែរ។

ភ្លេងបុរាណខ្មែរ"ទេពនិយម"បានការផ្តើមបរិយាកាសអាស៊ីអគ្នេយ៍ដោយកំដរយ៉ាងរងំប្រគុំដោយសិល្បករដ៏មានបទពិសោធន៍ប្រមាណ ១០នាក់ ដឹកនាំដោយសាស្ត្រាចារ្យដូរ្យដន្ត្រីនៃមហាវិទ្យាល័យយូម៉ាសឡូវែល សុវណ្ណ ខុន ។ បន្ទាប់ពីបើកសម្ពោធន៍កម្មវិធីដោយ សុបិន នឹង សំខុន ពិន ដំណាងកាសែត "ខ្មែរផុសស.រ.អា." មក តុលាយុត អ៊ុក ពីធីករបានអញ្ជើញលោក រីកឆឹត ហាវ. អ្នកនិពន្ធប្រវត្តក្រុងឡូវែលមកធ្វើអត្ថាធិប្បាយអំពីប្រវត្តនៃ"ពិធីបុណ្យកេរ្តិ៍នៃ វប្បធម៌អាស៊ីប៉ាស៊ីហ្វិកនឹងស្វាគមន៍ឯកឧត្តមឯកអគ្គរដ្ឋទូតអាមេរិកាំង ស៊ីច័ន្ទ ស៊ីវ ដើមកំណើតខ្មែរដែលបានមកជាកិត្តយសឱ្យអត្ថន័យដ៏ខ្ពង់ខ្ពស់ដល់ពីធីបុណ្យជាតិនេះ" ហើយអញ្ជើញរដ្ឋាភិបាលក្រុងឡូវែលទាំងអស់ឡើងមកជូនដល់ភ្ញៀវពិសេសនូវ "កូនសោកិត្តិយសក្រុងឡូវែល" បន្ទាប់ពីលោក ស៊ីច័ន្ទ ស៊ីវ បានថ្លែងសុន្ទរកថា ដ៏មានខ្លឹមសារស្តីអំពី "ការតស៊ូគ្មានទីបញ្ចប់ ដើម្បីសេចក្តីសង្ឃឹមរហូតដល់បានសម្រេចគោលដៅដ៏ខ្ពស់បំផុតនៃជីវិតរបស់លោក "អត្ថន័យសុន្ទរកថា នេះលោកបានសរសេរក្នុងសៀវភៅ "ឆ្អឹងមាស"របស់លោក ឥឡូវបានក្លាយជាសៀវភពបរទេសដែលលក់ដាច់ជាងគេបង្អស់នៅស.រ.អា.។ ភ្ញៀវស្តាប់យ៉ាងស្ងប់ស្ងាត់ជូនកាលផ្ទុះសំណើចជូនកាលទះដៃ ហើយចុងបញ្ចប់ក្រោកឈរគោរពវាគ្មិនដ៏មានទេពកោសល្យក្នុងការនិយាយឱ្យគេចង់ស្តាប់នៅពេលលោកបញ្ចប់ថា "យើងមកពីគ្រប់ទិសទីមកពីប្រទេសផ្សេងៗគ្នារួមគ្នានៅទីនេះ ក្លាយទៅជាមួយ គឺអាមេរិកា... យើងបានធ្វើល្អ (Well) កុំភ្លេចធ្វើឱ្យបានត្រឹមត្រូវ (Good) ពីព្រោះលោកអ្នកបានដាក់ខ្លួនជាថ្នាក់ដឹកនាំបន្តថែទាំវប្បធម៌របស់ខ្លួន ហើយបង្ហាញពីភពលោកថា លោកអ្នកប្រាកដជាអាមេរិកាំងមែន!"។

វប្បធម៌អាស៊ីមានចូលរួមដោយមន្ត្រីជាន់ខ្ពស់ដំណាងដោយអភិបាលក្រុង "រតនី អេលី យ៉ុត" ថ្នាក់គ្រប់គ្រងសហគមន៍នឹងសហគ្រាសន៍ធំតូចនានាសហគមន៍ខ្មែរនៃទីក្រុងឡូវែល លីន កូណិចទីកិត រ៉ូដអាយឡិន ហ្វីឡាដែលហ្សៀ ព្រមទាំងសហគមន៍ឡាវនឹងថៃផងដែរ ក្នុងពេលនោះក៏មានការណែនាំបង្ហាញខ្លួនឯកឧត្តមឯកអគ្គរដ្ឋទូតប្រចាំអ.ស.ប. ស៊ីច័ន្ទ ស៊ីវ ក្នុងនាមជាមន្ត្រីអាមេរិកាំងដើមកំណើតខ្មែរថ្នាក់ខ្ពស់ជាងគេចូល

ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក" ដែលប្រារព្ធនៅសហរដ្ឋអាមេរិក។ បន្ទាប់មកលោក អេលីយ៉ុត រតនី អភិបាលក្រុងឡូវែលបានឡើងថ្លែងអំពី "ក្រុងឡូវែល ដែលជាក្រុងនៃជនអន្តោប្រវេសន៍ស្វាគមន៍ដល់ពិធីបុណ្យជាតិកេរ្តិ៍ដំណែល

បរិយាកាសបន្តបន្ទាប់ខ្មែរផុសស.រ.អា.បាននាំមកជូនភ្ញៀវគ្រប់សញ្ជាតិនូវការបង្ហាញវប្បធម៌

តទៅទំព័រទី ០៤

តមកពីទំព័រទី ៣

## ទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក...

ប្រណិតចម្រុះមកពីប្រទេសអាស៊ីអគ្នេយ៍ មាន : ក្រុមរបាំ"អង្គរ"ផ្តល់ជូនរបាំទេពមនោរម្យ -សហគមន៍ខ្មែរ"ធីតារសូត"បង្ហាញសំលៀក

ភ្ញៀវបានកក់តុអង្គុយជាមុនយ៉ាងច្រើន រហូតដល់គ្មានតុជូនភ្ញៀវដែលមិនបានឱ្យដំណឹងជាមុនមានមកជាក្រុមដូចជាតំណាងសមាគម

វៃរបស់អ្នកឯកទេសស្ម័គ្រចិត្ត២រូបខាងកាច់ផ្កា នឹងតែងឆាក គឺអ្នកស្រី សេរី សុផាណា យោក និងអ្នកស្រី ចំប៉ា ថេង ការតុបតែងកម្រាលតុ-កៅអីដោយម្ចាស់ភោជនីយដ្ឋាន"ហុងកុង"នឹងការតាំងលំអរដោយផ្ទាំងគំនូរស្រុកខ្មែរនៅមាត់

នេះផងដែរ សម្រាប់ទទួលស្គាល់ជាសាធារណដល់ស្នាដៃប្រឹងប្រែងមិនឈប់ឈរសម្រាប់សេចក្តីថ្លៃថ្នូររបស់សង្គមខ្មែរមានការកសាងសមាគម "អង្គរ"គាំទ្រសិល្បវប្បធម៌ខ្មែរជូនដល់ជំនាន់ក្រោយប្រកបដោយជោគជ័យ គឺ



បំពាក់វប្បធម៌ខ្មែរ -ក្រុមសហគមន៍ឡាវនាំមកនូវរបាំជូនពរនឹងបង្ហាញសំលៀកបំពាក់តំបន់របស់ប្រទេសលាវដឹកនាំដោយគ្រូសារ ឡឹកកែវ និង ឡឿង ផ្គមម៉ាសីន -សហគមន៍ថៃបង្ហាញរបាំហោមរោងប្រដាល់"របាំមួយថៃ"ដឹកនាំ

ខ្មែរ១០នាក់ សមាគមអង្គរ៦នាក់គណបក្សសង្គ្រោះជាតិមកគាំទ្ររហូតជាង៣០នាក់ សមាជិកក្រុងខ្មែរសមាគមថៃទាំមនុស្សចាស់ៗច្រើនក្រុមមកចូល១០-១០cursor-positionនាក់រួមទាំងធានាគារឯកជនមិនត្រឹមតែមកចូល

ទ្វារចូលរបស់សិល្បករ ចាន់ថា ខឹម ដែលធ្វើឱ្យភ្ញៀវខ្មែរ-បរទេសយកជាកន្លែងថតរូបទុកជាអនុស្សាវរីយ៍បន្ទរកន្ទុយគ្នាកកកុញ។ បូករួមទាំងអ្នកស្ម័គ្រចិត្តឯទៀតៗទាំងអស់ប្រមាណ៥០នាក់រាប់ទាំងអ្នកភ្លេងបូរាណអ្នកសំដែង

បានជូនសញ្ញាប័ត្រកោតសរសើរដល់លោក ធិម ចាន់ធូ ស្ថាបនិករបស់សមាគមអង្គរ ។ លោក ធិម ចាន់ធូ អវត្តមានដោយមានធុរៈតែតំណាងសមាគមអង្គរទាំងមូលបានមកអបអរសាទរមាន លីនដា ស៊ូ ជា ប្រធានប្រតិបត្ត

ដោយ "គ្លា"ជាគ្រូបង្ហាត់ធ្វើឱ្យបរទេសដែលរស់ជុំវិញ មានការស្ញើចសរសើរនឹងប្លែកភ្នែកដោយបានឃើញវប្បធម៌មនុស្សដែលធ្លាប់រស់នៅក្បែរខ្លួនពីយូរមកហើយតែមិនស្គាល់ប្រទេសដើមគ្នាទៅវិញទៅមក ។

រួមទេ ថែមទាំងជួយ "ស្ប៉នស័រ"កម្មវិធីដ៏មានន័យសម្រាប់ឧត្តមគតិក្រុមនិមួយៗទៀតផង។

ខ្មែរផុសបានទទួលការកោតសរសើរគ្រប់មាត់ពីសាធារណជន ចំពោះការតុបតែងលំអរសាលទទួលភ្ញៀវបានល្អឥតខ្ចោះជាស្នាដៃឈ្លាស

កម្មវិធី នារាត្រីនោះបានទទួលនូវការពេញចិត្តហួសពីការទន្ទឹងស្មានខ្មែរផុសសូមថ្លែងអំណរគុណជំនួសភ្ញៀវដល់អ្នកស្ម័គ្រចិត្តទាំងនោះយ៉ាងស្មោះអស់ពីដួងចិត្ត។

ខ្មែរផុសស.រ.អាបានប្រើឱកាសដ៏ប្រសើរ

នឹងជាកូនស្រីបង្កើតមកទទួលសញ្ញាប័ត្រជំនួសផង ។

រាត្រីសមោសរបានបន្តរជាមួយក្រុមតន្ត្រីសម័យ"ខេមរា" ចាប់ពីម៉ោង៩កន្លះទៅក្រុម

តទៅទំព័រទី ០៥

តមកពីទំព័រទី ១ ទិវាគេហ៍ដ៏ពែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក...

អ្នកចម្រៀងនិងអ្នកភ្លេងបានបញ្ចេញស្នាដៃចម្រៀងថ្មីចាស់បន្តបន្ទាប់គ្នាយ៉ាពិរោះកំដរភ្ញៀវរាំកំសាន្តនិងពិសារភោជនាហារ៧មុខ រហូតដល់ម៉ោង១២អាធ្រាត ។





Continued from page 01

## KhmerPost USA GALA Celebration...

the former United States Ambassador to the United Nations and the author of Golden Bones, an account of his captivity and escape from the Killing Fields to a new life in the United States that took him to the White House and the United Nations.

Ambassador Siv began his remarks by describing last night's event and AAPI Heritage Month as a "celebration of America" in which we all come from many into one but also that our greatest strength as a country is our ability to maintain our heritage. He next gave an autobiographical account of his life. His father died when he was young but his mother made sure he attended the top school in Cambodia. In 1969, Siv became a flight attendant which permitted him to travel around the world. In China, he saw the horrors of the Cultural Revolution but never imagined that in just a few years the same violence and brutality would consume Cambodia. That happened in 1975 when the United States was powerless to intervene in Southeast Asia as the Communists took control of Vietnam and Cambodia. Soon the Khmer Rouge seized power in Cambodia and sought to eradicate all connections to modernity and the west which put anyone with education in peril. Siv's mother per-



suaded him to flee. He did so on a bicycle with minimal provisions. After three weeks of cycling as he neared the Thai border, he was captured, almost executed, but sentenced to a labor camp. He finally escaped and made a harrowing journey into Thailand. There, it was incarceration in a refugee camp until he was permitted to go to the United States where he ended up in Connecticut. He worked in a series of entry level jobs - Friendly's Ice Cream, New York City cabdriver - but eventually won acceptance to Columbia University where he obtained a Masters in Public Policy. Connections made there led him to the Reagen White House and a series of high level jobs in the American government under both Bush Administrations. Ambassador Siv closed by saying he was pleased to hear that Cambodian-Americans in Lowell are becoming involved in the political life of the community and ended with the advice to "be well, be wise, be worthy, be flexible, and always be able to adapt to difficult circumstances."

Lowell Mayor Rodney Elliott, after first making some remarks about the important role played by the Southeast Asian community in the city of Lowell, then presented Ambassador Siv with an official Mayoral Citation and a key to the city. Other elected officials in attendance at the event were City Councilors Rita Mercier, Corey Belanger and Bill Samaras; School Committee member Dave Conway; former City Councilors Rithy Uong, Vesna Nuon and Marty Lorrey; candidates for the 18th Middlesex District representative seat, Ratha Paul Yem and Rady Mom; and Lynn City Councilor Hong Net and Cambridge City Councilor and candidate for Lieutenant Governor Leland Cheung.

The event also included an excellent multi-course dinner, music by Khemarak Band, traditional Cambodian dances by members of the Angkor Dance Troupe, a Community Service Award to Tim Thou, the founder of the Angkor Dance Troupe, and a fashion show of traditional Cambodian and Laotian clothing.

សុខភាព

## ខ្ទឹមក្រហមជួយបំបាត់រោគផ្តាសាយតឹងច្រមុះហៀរសំបោរ



ខ្ទឹមក្រហមមិនត្រឹមតែជាអាហារដ៏មានឱជារសនោះទេ បន្លែមួយប្រភេទនេះអាចប្រើធ្វើជាឱសថក្នុងការបំបាត់រោគមួយចំនួនបានយ៉ាងប្រសិទ្ធភាពទៀតផង ។ តាមការសិក្សារបស់ក្រុមអ្នកស្រាវជ្រាវបញ្ជាក់ថា ខ្ទឹមក្រហមអាចប្រើបានទាំងកុមារ និងមនុស្សធំ ។ ក្រៅពីនេះក្នុងការប្រើជាឱសថ គេក៏អាចប្រើបានទាំងឫស មើមស្លឹក មិនថាជាខ្ទឹមក្រហមស្រស់ ឬស្ងួតទេ គឺអាចប្រើធ្វើជាឱសថបានដូចគ្នាទាំងអស់ ។

តាមធម្មតាគេអាចប្រើខ្ទឹមក្រហមបំបាត់អាការរលាកក្លាយផ្សេងៗដូចជា បំបាត់អាការរោគមុនរលាកក្លាយ បំបាត់ស្នាមជាំ និងអុជខ្មៅស្នាមពកជាំនៅលើផ្ទៃមុខ និងតាមរាងកាយជួយរំលាយអាហារ និងជួយឱ្យបរិភោគអាហារបានច្រើន ។ ជាមួយគ្នានោះគេក៏អាចប្រើធ្វើជាឱសថបំបាត់អាការឆ្អល់ពោះបញ្ចេញខ្យល់ផោមជួយបញ្ចុះទឹកនោម និងពិសេសគេអាចដាំយកទៅដាក់ត្រង់ក្នុងបន្ទប់ ដើម្បីបំបាត់ក្លិនហប់ស្អុយបានមួយចំណែកថែមទៀត ។

*វិធីបំបាត់រោគ១-ប្រើខ្ទឹមក្រហមមួយ

តទៅទំព័រទី ២៤

# អភិបាលរដ្ឋ ដេវ៉ល ផាទ្រីក ប្រារព្ធខែនៃទិវាវប្បធម៌ អាស៊ីប៉ាស៊ីហ្វិកនៅឡូវែល

# Gov Patrick Celebrates Asian Heritage Month in Lowell

Governor Deval Patrick officially proclaimed the month of May to be Asian American and Pacific Islander Heritage Month in the Commonwealth of Massachusetts at a celebration in Lowell on May 8, 2014. Held at the Sunny Da Restaurant and sponsored by the Governor's Asian American Commission/Advisory Council and Lowell's Southeast Asian community, the event began with greetings from Mayor Rodney Elliott and from former city councilors Rithy Uong and Vesna Nuon followed by performances by the Angkor Dance Troupe (Cambodian), the Buddhab havanna Cultural Dancers (Laotian) and the Karenni Dance Group (Burmese) followed by a poetry reading by Princess Chan.



អភិបាលរដ្ឋ ដេវ៉ល ផាទ្រីក ថតជាមួយពលរដ្ឋអាស៊ីនៅឡូវែល



Governor Patrick was delighted by the performances and invited all the dancers and poets to the stage with him. In his remarks, Governor Patrick said that the dances and the poetry were important examples of how the Asian and Pacific Islander cultures "enrich us, expand us, make us stronger, and make us aware of a world that is greater than the little corner that we live in." He thanked Asian Americans and Pacific Islanders for making the Commonwealth so much stronger because of their example of resilience.

Governor Patrick continued by saying that the United States was the first country ever organized around ideas and that those organizing ideas included equality, opportunity and fair play. He concluded by saying "The presence of generation after generation of new comers who lay claim to those ideals is what makes America work."

**អត្ថបទដោយ : រីឆាដ ហូវ**
**ប្រែសម្រួលដោយ : សុខា**

អភិបាលរដ្ឋ ដេវ៉ល ផាទ្រីក បានប្រកាសជាផ្លូវការខែឧសភាជាខែនៃការប្រារព្ធទិវាកេរ្តិ៍តំណែលវប្បធម៌នៃអាស៊ីប៉ាស៊ីហ្វិក ក្នុងរដ្ឋម៉ាសាឈូសេតនៅឯការប្រារព្ធពិធីមួយក្នុងក្រុងឡូវែល កាលពីថ្ងៃសៅរ៍ ទី០៨ ខែឧសភា ឆ្នាំ២០១៤។ កម្មវិធីនេះប្រព្រឹត្តទៅនៅភោជនីយដ្ឋាន សាន់នី ដា ក្រោមការឧបត្ថម្ភពីក្រុមប្រឹក្សារដ្ឋាភិបាលនៃគណកម្មាធិការ និងជំប្រឹក្សានៃអាស៊ានអាមេរិកាំង ព្រមទាំងសហគមន៍អាស៊ីអាគ្នេយ៍។ កម្មវិធីរាត្រីនោះ ចាប់ផ្តើមដោយមតិបដិសណ្ឋារកិច្ចនៃអភិបាលក្រុងឡូវែល រ៉តនី អេលៀត និងអតីតទីប្រឹក្សាក្រុងទាំងពីររូបមានលោក ឫទ្ធី អ៊ុង និងលោក វ៉ាសនា នួន ហើយរបៀបវារៈនៃកម្មវិធីបន្តដោយការសម្តែងពីក្រុមរបាំអង្គរ (ខ្មែរ) របាំវប្បធម៌ ប៊ុដ្ឋា បាវ៉ាណា (ឡាវ) និងរបាំការ៉េនីជាក្រុម(ភូមា) បន្តដោយការសូត្រកំណាព្យដោយព្រីនសេស ច័ន្ទ។

អភិបាលរដ្ឋ ផាទ្រីក មានសេចក្តីសោមនស្ស និងកោតសរសើរចំពោះការសម្តែង ហើយលោកបានអញ្ជើញអ្នកសូត្រកំណាព្យ និងអ្នកសម្តែងទាំងអស់ឡើងលើវេទិកាឈររួមគ្នាជុំនឹងលោក។ ក្នុងមតិរបស់លោក លោកអភិបាល ផាទ្រីក បានមានប្រសាសន៍ថា របាំ ការរាំ និងកំណាព្យជាឧទាហរណ៍ដ៏សំខាន់ដែលបង្ហាញពីប្រសើរនៃសាសន៍អាមេរិកចេញពីវប្បធម៌ចម្រុះដែលផ្តល់ដោយជាតិសាសន៍នានានៅលើទឹកដីនេះ៕

# បច្ចុប្បន្នភាពនៃក្រុងខ្មែរ



លោក តុល្លាយុត្តិ ឱក



បណ្ឌិត សេងលី គង់

**ដោយ : សុខា**

**ក្រុងឡូវែល :** ថ្នាក់ដឹកនាំនៃគណកម្មការក្រុងខ្មែរ រួមមានបណ្ឌិត សេងលី គង់ និងលោក តុលាយុត្តិ ឱក បានផ្ដល់បទសម្ភាសន៍ស្ដីពីការវិវត្ត និងបច្ចុប្បន្នភាពនៃក្រុងខ្មែរ ។ លោកទាំងពីរបានផ្ដល់បទសម្ភាសន៍នៅរសៀលម៉ោងបីនៃការិយាល័យសារព័ត៌មានខ្មែរផុស ។

កម្មវិធី ក៏ដូចជា គម្រោងដែលក្រុងខ្មែរបានបំពេញហើយ នាពេលថ្មីៗនេះមានជាអាទិ៍បុណ្យចូលឆ្នាំខ្មែរបុណ្យផ្កាប្រាក់សាមគ្គីប្រព្រឹត្តទៅនៅភោជនីយដ្ឋានសំពៅមាសកាលពីខែមីនា និងកម្មវិធីហ្គាឡារបស់ក្រុងខ្មែរនៅខែមេសា ដែលប្រព្រឹត្តទៅនៅភោជនីយដ្ឋានហុងកុង ។

កម្មវិធីដែលកំពុងប្រព្រឹត្តទៅនាពេលបច្ចុប្បន្នមានតួយ៉ាងដូចជា កម្មវិធីទូរសទស្សន៍ក្រុងខ្មែរ មានបណ្ឌិត ផល្លា ជា សហការ និងការអបអរសាទរទិវាវប្បធម៌ខ្មែរដែលក្រុងខ្មែរបានសហការជាមួយស្ថាប័នជាដៃគូរបួនទៀត គឺសាលាសាធារណៈក្រុងឡូវែលវេសស៊ីនស្ទុឌីយោ យូម៉ាសឡូវែល និងសួនប្រវត្តិសាស្ត្រក្រុងឡូវែល ។



បណ្ឌិត ផល្លា ជា ណ្ឌិត សេងលី គង់

គម្រោងបន្ទាប់គឺការដាក់បន្ថែមផ្ទាំងក្រុងខ្មែរ ដែលជាង១០ផ្ទាំងបន្ថែមទៀត ណោ

គម្រោងដែលកំពុងដំណើរការ គឺការសាងសង់រូបសំណាកព្រហ្មមុខបួនដែលនឹងមានសេចក្ដីពិស្ដារក្នុងខ្លឹមសារខាងក្រោម ។

ផ្អែកតាមប្រសាសន៍រួមរបស់បណ្ឌិត សេងលី គង់ និងលោក តុល្លាយុត្តិ ឱក គម្រោងសាងសង់រូបសំណាកព្រហ្មបាយ័នមានការវិវត្តគួរកត់សម្គាល់ជាច្រើនក្នុងនោះមានបញ្ហាហេតុនៃការសាងសង់រូបសំណាកការជ្រើសរើស និងផ្លាស់ប្ដូរចំណុចសាងសង់រូបសំណាកកិច្ចការរដ្ឋបាលក្នុងសហរដ្ឋអាមេរិក និងព្រះរាជាណាចក្រកម្ពុជា និងកិច្ចចរចាជាមួយម្ចាស់ដី ដើម្បីសាងសង់រូបសំណាក ។ ពាក់ព័ន្ធទៅនឹងទីតាំងនៃការសាងសង់មុខព្រហ្មបាយ័នដំបូងឡើយក្រុងខ្មែរបានស្នើទៅខាងការិយាល័យសម្រាប់គម្រោង និងការអភិវឌ្ឍនៃសាលាក្រុងឡូវែលជ្រើសរើសយកចំណុចប្រសព្វនៃផ្លូវ ប្រាន់ឆ័ស្ទ្រីត និង ម៉ុដដលសិក ត្រង់ចំណុចរាងត្រីកោណ ។ ប៉ុន្តែលក្ខខណ្ឌកម្ពស់រូបសំណាកដែលខាងសាលាក្រុងបានផ្ដល់ដំបូងនោះ គឺមិនលើសបីហ្វីត ។ បន្ទាប់ពីនោះមកក្រុងខ្មែរបានពិចារណាម្ដងទៀតលើទីតាំងចំណុចត្រីកោណនោះ ហើយក៏សម្រេចផ្លាស់ប្ដូរទីតាំងដោយរំកិល

**តទៅទំព័រទី ២៦**

# របាយការណ៍ពិសេសស្តីពីអតីតឯកអគ្គរដ្ឋទូតប្រចាំអង្គការសហប្រជាជាតិ ស៊ីចាន់ ស៊ីវ

## ក្នុងដំណើរទស្សនកិច្ចមកកាន់ឡូវែលរៀបចំដោយសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក

**ដោយ : សុខា**

ក្រុងឡូវែល និង លីន នៃរដ្ឋម៉ាសាឈូសេត : លោកធ្លាប់តែអង្គុយលើកៅអីហ្វឺសខ្លាស (First Class) តាមជើងយន្តហោះពេលធ្វើដំណើរឆ្លងរដ្ឋ ខណៈដែលលោកមានបេសកកម្មផ្តល់វត្តមានក្នុងការថ្លែងសុន្ទរកថា ចុះហត្ថលេខលើសៀវភៅដែលលោកនិពន្ធ ឬដំណើរក្នុងនាមជាភ្ញៀវកិត្តិយសជាអធិបតីនៃពិធីណាមួយ។ លុះដល់ដើមខែឧសភាត្រូវនឹងថ្ងៃទីពីរឆ្នាំ២០១៤ អតីតឯកអគ្គរដ្ឋទូតប្រចាំអង្គការសហប្រជាជាតិក្នុងកាលវិភាគមមាញឹកនៃទីតាំងទីទៃពីគ្នាវាងតិចសាស់ និងម៉ាសាឈូសេត ដើម្បីទាន់ដំណើរលោកទទួលបទពិសោធន៍អង្គុយកៅអីធម្មតា ទោះលោកត្រូវបានអញ្ជើញជាអធិបតីនៃកម្មវិធីទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិកក៏ដោយ។

ចុះពីលើយន្តហោះពីបសស្តុនលោកបន្តដំណើរមកដល់ក្រុងឡូវែលនឹងទទួលទានអាហារថ្ងៃត្រង់ដោយតម្រង់យកមុខម្ហូបសម្លកកូរត្រីអណ្តែងចៀនជ្រក់ស្វាយនៅភោជនីយដ្ឋានកុលាបក្រហម ចំណែកក្រុងលីននៅភោជនីយដ្ឋានថ្មដា លោកបានទទួលទានញាំស្តៅ ណែមឆៅ បុកល្ហុងស្លាបពាន់បំពង សាច់ជ្រូកចៀន ទឹកសណ្តែកដែលអាហារទាំងអស់នេះ ពិបាករកនៅឯរដ្ឋតិចសាស់ដែលលោករស់នៅណាស់។ ជាប់ចិត្តម្ហូបនេះ លោកបានបន្តទទួលទានអាហារនេះពេលល្ងាចម្តងទៀត ពេលត្រឡប់មកសណ្ឋាគារវិញ។ លោកក៏បានសាកល្បងរសជាតិទឹកអារ៉ូកាដូកិនផងដែរ ដោយការនិយាយលេងថា រក្សាវ័យឱ្យនៅក្មេង។ និយាយលេងមួយទៀត ដែលសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកបានមានឱកាសស្តាប់ពីលោក លោកបានលើកឡើងថា "ពណិសក់លាបឱ្យគេអាណិត!"។ សកម្មភាពជាច្រើន ជាបច្ច័យល្អញាំងឱ្យអតីតឯកអគ្គរដ្ឋទូតអាមេរិកប្រចាំអង្គការសហប្រជាជាតិរូបនេះ អាចរក្សាវ័យបានយ៉ាងល្អ និងមានសុខភាពមាំមួន គឺការហាត់ប្រាណដោយជិះកង់ ជិះសេះ ស្រោចដំណាំដើមឈើ និងផ្កា។ ទាក់ទិននឹងរឿងដំណាំលោកមានប្រសាសន៍ថា ភរិយារបស់លោកជាអ្នកដាំ ហើយលោកជាអ្នកស្រោច។








ការបើកយន្តហោះជាចំណង់ចំណូលចិត្តដែលយើងបានស្វែងយល់ពីលោក។ ក្នុងនោះប្រភេទយន្តហោះដែលលោកបើក គឺម៉ូដែលសេសណា 172 (CESSNA172)។

ជាទូទៅបុរសមិនសូវចំណាប់ចំអិនម្ហូប ឬចំណាយពេលក្នុងជើងក្រានដូចស្ត្រីឡើយ។ ដោយឡែកលោកស៊ីចាន់ ស៊ីវ មានទម្លាប់មួយក្នុងការចំអិនម្ហូបលោកបង្ហើបថា ពេលដែលលោកចំអិន គឺមានតែរូបលោកម្នាក់គត់ក្នុងជើងក្រាន។ លោកចង់ឱ្យកិច្ចការនេះ ប្រព្រឹត្តទៅដោយតែលោកមួយគត់។ រំឭកដល់វេលាមិនគួរបំភ្លេចបានមួយ លោកធ្លាប់ចំអិនគុយទាវភ្នំពេញសម្រាប់ភ្ញៀវសំខាន់មានឯកអគ្គរដ្ឋទូតអន្តរជាតិនានា និងភ្ញៀវដទៃទៀតដល់ទៅ៦០នាក់។

ក្នុងអត្ថបទពិសេសនេះលោកអ្នកអាននឹង

**តទៅទំព័រទី ២០**





"APSARA"
BY H.M. KING
SIHANOUK
"DON'T THINK I'VE
FORGOTTEN"

Never give up hope Nunca perca a esperança No pierdas la esperanza

## តមកពីទំព័រទី ១ ទិវាមាតា "Mother´s Day"....

ទាំងធ្វើ"ច្បាប់"ចងសីលធម៌ឱ្យរឹតតែរឹងមាំដើម្បីការគោរពស្ត្រីរបស់គេ។

"ហេតុអ្វីក៏ថ្ងៃទី១១ឧសភាឆ្នាំនេះ យើងត្រូវយកចិត្តទុកដាក់ទៅលើមាតា?" ពីព្រោះម្តាយជាអ្នកឱ្យជីវិតដល់មនុស្សគ្រប់រូប ដូច្នេះថ្ងៃ"ទិវាមាតា"ជាថ្ងៃដែលគេពង្រឹង"សីលធម៌"សម្រាប់កាពារជីវិតប្រសើររបស់មនុស្សម្តាយនឹងកូន គឺជាជីវិតរីករាយជីវិតមានក្តីសង្ឃឹមដែលផ្តល់ត្រឡប់មកឱ្យគ្រួសារវិញនូវ"សុភមង្គល"សម្រាប់ការរួមរស់ជាមូលដ្ឋាន"កោសិកា"នៃសង្គមមនុស្ស។ យើងប្រើពាក្យមាតាបានន័យថា យើងត្រូវគិតយ៉ាងហោចណាស់ទៅដល់មនុស្ស២នាក់ដែរដែល១ជាម្តាយ១ទៀតឬច្រើនទៀតជាកូន ។"មាតា - ស្ត្រី-កុមារី ទារិកា" សុទ្ធសឹងជាចង្កោមមនុស្សភេទ"ញី"ដែលត្រូវតែមនុស្សភេទ"ឈ្មោល"ផ្តោតអារម្មណ៍ថែរទាំទាំងកាយទាំងចិត្តគ្រប់ដំណាក់ការនៃជីវិត ដើម្បីជួយឱ្យ"មាតា"ក្លាយជាមនុស្សប្រសើបំផុតសម្រាប់មនុស្សលោក។

វប្បធម៌ខ្មែរជំនាន់ដើមមានឈ្មោះថា "មាតាធិបតេយ្យ" បានន័យថា "ស្ត្រីម្តាយជាធំ" ជាមគ្គុទ្ទេសជាអ្នកដឹកនាំដូចជាស្តេចខ្មែរកាលពីជំនាន់សតវត្សទី១ ព្រះនាង លីវយី ជាអ្នកគ្រប់គ្រងផែនដីមានរបៀបរស់នៅជាមេផ្ទះជាមេស្រុកជាមេការដឹកនាំការដ្ឋានជាមេកងដឹកនាំទ័ពជាមេរៀនដឹកនាំការសិក្សាជាមេបាដឹកនាំពីធីនានាមុនបុរស...។ល។ បន្តការគ្រប់គ្រងរបៀបនេះតាំងពី៤០០០ឆ្នាំមុនមកហើយ រហូតដល់សតវត្សទី២ដែលឥណ្ឌានាំយករបប"បីតាធិបតេយ្យ"មកជំនួសឱ្យខ្មែរប្រើរហូតមកដល់សព្វថ្ងៃ... នេះគ្រាន់តែចង់រំលឹកថា "ស្ត្រីជាសមត្ថភាពធម្មជាតិ"ថែមទាំង "ស្ត្រីជាសមត្ថភាពប្រវត្តិសាស្ត្រ"ទៀតផងដែរ ដូច្នេះវានឹងបញ្ឈប់ការគិតដែលថា "បុរសខ្លាំងជាងស្ត្រីត្រូវតែជាអ្នកគ្រប់គ្រងសង្គម"មិនប្រាកដជាត្រូវនោះទេ "ច្បាប់ទម្លាប់"ដែលលើកដំកើងសមត្ថភាពតែបុរស់ខ្មែរនឹងបុរសទូទៅថា គ្រាន់បើជាងស្រីបានត្រូវសង្គមមនុស្សជឿនលឿនបោះបង់ច្រើនណាស់ហើយ។

រំលឹកពីគុណសម្បត្តិមាតាពីព្រោះតែមនុស្សក្នុងធម្មជាតិចេះតែប្រើកម្លាំងបាយចង់ខ្លាំងជាងអ្នកដទៃជាដំរាបស្ត្រីតែងតែត្រូវសង្គមបុរសគ្រប់គ្រងប្រើជាប្រយោជន៍ផ្ទាល់ខ្លួនជារឿយៗនេះមិនមែនជាការធ្វើត្រូវរបស់មនុស្ស ហើយក៏មិនមែនជាការចំណេញដល់បុគ្គលដែលប្រព្រឹត្តក៏ទេដែរ សង្គមដែលចំណេញពីស្ត្រីភេទ គឺប្រាកដជាសង្គមដែលមានកុមារីស្ត្រីអាចក្លាយជា"មាតា"យ៉ាងសុខសប្បាយ។ ស្ត្រីតែងតែទន់ភ្លន់ព្យាយាមថ្នាក់ថ្នមចំពោះកូនចៅចេះនឹងចង់ប្រើសម្ផស្សធ្វើឱ្យគេស្រឡាញ់ចង់ធ្វើអ្វីដែលនឹងទទួលការកោតសរសើរឆាប់មានមនោសញ្ចេតនាទោរទន់ឆាប់សើចឆាប់យំរូបរាងកាយប្រែប្រួលពីកុមារីទៅជាស្ត្រីស្រស់ស្អាតយ៉ាងឆាប់រហ័ស ហើយនៅរក្សាសោភណ្ឌភាពបានយូរបាន...។ល។ ការប្រើចំណេះនេះទៅថែរទាំបំពេញចិត្តនារីទោះជានរណាក៏ដោយ គឺជាការផ្តើមយល់អំពីអត្ថន័យនៃ"ទិវាមាតា"ពិតប្រាកដផ្ទុយទៅវិញ បើយកចំណេះដឹងស្គាល់ពីស្ត្រីទៅប្រើជាប្រយោជន៍ផ្សេងពីប្រយោជន៍ស្ត្រីម្ចាស់ខ្លួន ដូចជាទាសកម្មបំរើភេទបុរសបំរើនយោបាយ...។ល។ មិនមែនជាឧត្តមគតិ"ទិវាមាតា"នោះទេ។

សង្គមមាតាបច្ចុប្បន្នស្ត្រីកាន់តែច្រើនរៀងរាល់ថ្ងៃក្នុងសង្គមបច្ចុប្បន្នកំពុងទទួលភារកិច្ចទទួលខុសត្រូវជំនួសបុរសកាន់តែធំទៅនៅប្រទេសតូចធំរាប់ទាំងប្រទេសមហាអំណាចផង ស្ត្រីខ្លះបានឡើងកាន់ដំណែងខ្ពង់ខ្ពស់បំផុតជាប្រធានាធិបតីនៅក្នុងប្រទេសទៀតផង។ ស្ត្រីកាន់តែច្រើនឡើងចូលរួមក្នុងការកសាងប្រទេសកាន់តែកុះករការពារបុរសមកវិញបាននឹងកាពារខ្លួនឯងដោយខ្លួនឯងបានផងដែរ...នៅសង្គមខ្មែរ-អាមេរិកាំងនាបច្ចុប្បន្ននេះ ដូចជានៅឡូវែលនៅហ្វីឡាដែលហ្វៀ នៅរ៉ូដអាយឡិន នៅកុណិចទីកិតប្រធានសហគមន៍ធំៗក្នុងតំបន់បានប្តូរដៃមកឱ្យស្ត្រីកាន់កាប់បានលទ្ធផលរឹតតែប្រសើរមិនតែប៉ុណ្ណោះ ស្ត្រីធំៗទាំងនោះមានអាយុកាន់តែក្មេងឡើងៗថែមទៀត... នេះគឺដំណាក់ការណ៍នៃស្មារតី"ទិវាមាតា"បានឡើងដល់កំពស់ដែល"មាតាធិបតេយ្យ"ឬ"បិតាធិបតេយ្យ"រួមគ្នាទៅ"ប្រជាប្រជាធិបតេយ្យ"ដែលបុរសស្ត្រីប្រជែងគ្នាប្រកបដោយស្មារតីជាកីឡាករតែរីករាយនឹងឃើញដៃគូរប្រគួតបានទទួលជ័យជំនះតែមួយប៉ុណ្ណោះ៕



# ជីវិតជាអ្នកតំណាងរាស្ត្របក្សប្រឆាំង

**បទសម្ភាសន៍ដោយៈ ខ្មែរផុសស.រ.អា.**

យើងបានជួបសម្ភាស៍ជាមួយ ជាម ឆានី សមាជិកសភាគណបក្សសង្គ្រោះជាតិមណ្ឌលកំពង់ធំ កាលពីថ្ងៃទី២៦មេសា២០១៤នេះ ដែលបានមកធ្វើទស្សនកិច្ចនៅទីក្រុងឡូវែលមានខ្លឹមសារដូចតទៅនេះ :

**ខ្មែរផុស** តើលោកអញ្ជើញមកឡូវែលនេះប៉ុន្មានដងហើយ ?

**ជាម ឆានី** បាទមកទល់ពេលនេះ៤ដងហើយ តែមុននឹងមកដល់ចុងក្រោយនេះឃ្លាតគ្នា ១០ឆ្នាំ ។

**ខ្មែរផុស** ខ្ញុំដឹងថា លោកជាសមាជិកសភានេះមិនមែនតែលើកនេះទេ តើជាប់ប៉ុន្មានដងហើយ?

**ជាម ឆានី** បាទជាប់៤ដងហើយ ពីមុនជាសមាជិកសភាគណបក្ស សម រង្ស៊ី ឥឡូវគណបក្សសង្គ្រោះជាតិ ។

**ខ្មែរផុស** តើលក្ខណៈសម្បត្តិអ្វីខ្លះដែលនាំឱ្យប្រជារាស្ត្រខ្មែរបោះឆ្នោតឱ្យលោកម្តងហើយម្តងទៀត?

**ជាម ឆានី** ខ្ញុំអាចកត់សំគាល់ថា ប្រជាពលរដ្ឋលោកបោះឆ្នោតឱ្យយើងពីព្រោះ ទី១ គាត់ដឹងថាយើងធ្លាប់ចេញមុខកាពារពួកគាត់ ដូចជាពេលមានការរំលោភដីធ្លីពេលមានអំពើពុករលួយពេលមានអំពើអយុត្តិធមិនៅតុលាការជាដើម តើមានមុខយើងហ៊ានចេញមុខកាពារគាត់ដែរឬទេ? ទី២ មានមួយចំនួននោះតាមឃ្លាំមើលថា តើនៅសភាយើងមានមុខហ៊ានការពារនឹងធ្វើច្បាប់តទល់នឹងរដ្ឋអំណាចដែរឬទេ? ទី៣ ពួកគាត់ចំណាំថា យើងមានឧស្សាហ៍ចុះសួរសុខទុក្ខពួកគាត់ដែរ ឬទេ? ទាំងនេះជាចំណុចដែលធ្វើឱ្យប្រជាពលរដ្ឋបោះឆ្នោតឱ្យយើង ជាពិសេសទៅទៀតនោះ គាត់មើលជំហ៊ររបស់យើងថាតើស្មោះត្រង់នឹងជាតិចេះការពារទឹកដីការពារប្រជាពលរដ្ឋ ខ្លួនឯងដែរឬទេ បើមានមែនយើងនៅតែមានឱកាសធ្វើឱ្យប្រជាពលរដ្ឋបោះឆ្នោតឱ្យយើងបានតទៅទៀត ។

**ខ្មែរផុស** កាលពីមុនលោកជាសមាជិកសភាគណបក្ស សម រង្ស៊ី ឥឡូវ លោកជាសមាជិកសភាគណបក្សសង្គ្រោះជាតិ តើអ្វីទៅដែលខុសគ្នា?

**ជាម ឆានី** ខុសគ្នាច្រើន មិនដូចមុនទេ កាលពីមុនយើងយើងមានគ្នាតិចយើងកោះហៅសមាជិករដ្ឋាភិបាលមកដេញដោលគេហៅថា មកបញ្ជេរដើងយើងធ្វើមិនបានទេ តែឥឡូវយើងចូលរួមគ្នាជាគណបក្សសង្គ្រោះជាតិមានគ្នាច្រើនយើងអាចធ្វើបាន ហើយអាចបោះឆ្នោតមិនទុកចិត្តចំពោះរដ្ឋមន្ត្រីនោះបានផង ហើយម្យាងទៀតកាលពីនៅបែកគ្នាឯកឧត្តម សម រង្ស៊ី និងឯកឧត្តម



លោក ជាម ឆានី តំណាងរាស្ត្រ៤អាណត្តិ

កឹម សុខា ទទួលបាននូវការគាំទ្របានច្រើនហើយ តែដល់យើងរួមបញ្ចូលគ្នាការគាំទ្រមិនត្រឹមតែមានរឹតតែច្រើនទេ គឺបាក់មកតែម្តង ។

**ខ្មែរផុស** គណបក្ស សម រង្ស៊ី ធ្វើការបានប្រសើរជាមួយគណបក្សសិទ្ធមនុស្សចុះវាខុសអ្វីនឹងសម្ពន្ធភាពជាមួយគណបក្សហ្វ៊ុនស៊ីនប៉ិច ហេតុអ្វីក៏ធ្វើមិនបានល្អ?

**ជាម ឆានី** បាទខុសគ្នាឆ្ងាយណាស់ ដូចជានៅឆ្នាំ១៩៩៨ ឬ២០០៣ ជាដើម យើងបានកៅអីរឿង១ខ្លួនហើយខាងយើងមានការប្តេជ្ញាចិត្តខ្ពស់ណាស់ថា "ត្រូវតែប្តូរការគ្រប់គ្រងពីលោក ហ៊ុន សែន ឱ្យបាន" តែដៃគូរយើងស្តេចក្រុមព្រះនរោត្តមរណឫទ្ធមិនមានភាពស្មោះត្រង់លោក-មិនមានសច្ចភាពដូចដែលលោកនិយាយជាមួយយើងទេ

**ខ្មែរផុស** បើនិយាយពីប្រជាពលរដ្ឋខ្មែរវិញ តើពីឆ្នាំ២០០៣មកដល់២០១៣ មានការខុសគ្នាយ៉ាងម៉េចទៅ?

**ជាម ឆានី** បាទ! កាលពីឆ្នាំ២០០៨យើងបានទៅបោះឆ្នោតបែកគ្នាប្រជាពលរដ្ឋបានសម្តែងការមិនពេញចិត្តលទ្ធផលនៃការធ្វើការរួមគ្នាក៏បានតិចតួចដូចជា២បូកនឹង២បាន៤ដែរ តែដល់ឆ្នាំ២០១៣ មានរឿងស្មានមិនដល់ គឺនៅពេលយើងសម្រេចចូលគ្នាស្រាប់តែលទ្ធផល២បូកនឹង២ក្លាយទៅជា១០ទៅវិញ គឺប្រជាពលរដ្ឋឈរកណ្តាល៦នាក់ទៀតដែលនៅសល់បានសម្តែងការពេញចិត្តសម្រេចចិត្តផ្តល់សម្លេងឱ្យគណបក្សសង្គ្រោះជាតិទាំងអស់ខ្ញុំធ្វើនយោបាយ២០ឆ្នាំហើយមិនដែលឃើញពលរដ្ឋផុសផុលអីដូចពេលនេះទេបាទនេះគឺការខុសគ្នា ។

**ខ្មែរផុស** លោក កឹម សុខា ទើបនិយាយថ្មីៗនេះថា "ប្រជាពលរដ្ឋមានការផុសផុលយល់ភារកិច្ចរបស់ខ្លួនច្បាស់ហើយ បើមានអ្នកនយោបាយ ឬក៏មិនមាន ក៏ប្រជាពលរដ្ឋអាចធ្វើការតស៊ូដោយខ្លួនឯងបានហើយ តើលោកយល់យ៉ាងម៉េចចំពោះប្រយោគនេះ?

**ជាម ឆានី** ខ្ញុំឃើញថា ពលរដ្ឋចេះតស៊ូរើ



បំរះពីរបបគ្រប់គ្រងដោយលោក ហ៊ុន សែន មែនហើយ តែខ្ញុំមានទស្សនៈខុសពីនេះបន្តិចថា "បើគ្មានគណបក្សប្រឆាំងច្បាស់លាស់មួយ បើគ្មានគណបក្សសង្គ្រោះជាតិដឹកនាំដោយឯកឧត្តមប្រធាន សម រង្ស៊ី នឹងឯកឧត្តមអនុប្រធាន កឹម សុខា នឹងពួកយើងខ្ញុំដែលច្បាស់លាស់ពិតប្រាកដទេនោះប្រជាពលរដ្ឋក៏មិនមានទិសដៅច្បាស់លាស់ដែរ ប្រជាពលរដ្ឋលោកមានពន្លឺរបស់លោកហើយ តែគណបក្សសង្គ្រោះជាតិជាអ្នកបំភ្លឺឱ្យរឹតតែច្បាស់ជូនប្រជាពលរដ្ឋ ដូចជាគោលជំហ៊រ៧ចំណុចរបស់គណបក្សសង្គ្រោះជាតិជាដើម"

**ខ្មែរផុស** បានន័យថា "ប្រជាពលរដ្ឋត្រូវការគណបក្ស រីឯគណបក្សក៏ត្រូវកាប្រជាពលដ្ឋវិញដែរមែនទេ?

**ជាម ឆានី** បាទមែនហើយ!

**ខ្មែរផុស** នៅអាណត្តិថ្មី២០១៣នេះ នៅពេលគណបក្ស សម រង្ស៊ី ចូលគ្នាជាមួយគណបក្សសិទ្ធមនុស្សបង្កើតបានជាគណបក្សសង្គ្រោះជាតិមានតំណាងរាស្ត្រជាច្រើនមកពីក្រៅប្រទេស ដូចជា ទៅពីអាមេរិកទៅពីបារាំងជាដើម តើតំណាងរាស្ត្រទាំងនោះបានមកជាជំនួយដល់ការដឹកនាំគណបក្សសង្គ្រោះជាតិច្រើនទេ ?

**ជាម ឆានី** បាទ! នេះជារឿងប្លែកត្រង់ថាគណបក្សសង្គ្រោះជាតិបានទទួលតំណាងរាស្ត្រថ្មីហើយជាពិសេសលើកនេះមានកម្លាំងច្រើនមកពីអាមេរិកមកពីបារាំងជាដើម គឺជួយគណបក្សសង្គ្រោះជាតិបានច្រើនមែនទែន ពីព្រោះដូចនៅឡូវែលនៅហ្វីឡាដែលហ្វៀនេះ បងប្អូនបានបងបានបញ្ជូនតំណាងរាស្ត្ររបស់លោកទៅធ្វើការនៅកម្ពុជា ដូចជាលោក ង៉ោ ជាង លោក នុត រំដួល ជាពិសេសលោក កែវ សម្បត្តិ ។ល។ ដូច្នេះបងប្អូនមានតំណាងផ្ទាល់ដែលអាចជួយដល់កម្ពុជាអាចឱ្យយោបល់អាចមានសកម្មភាពជាមួយពលលរដ្ឋខ្មែរបាន ដូច្នេះចលនានេះមានសន្ទុះខ្លាំងជាងមុន

**ខ្មែរផុស** នៅពេលប្រទះចលនាមនុស្សដ៏ច្រើនលើសលុបនៅពេលតំណាងរាស្ត្រគ្មានប្រាក់ខែគ្មានអំណាច តើមានធនធានពីណាមកសម្រាប់



គាំទ្រសកម្មភាពទាមទារតវ៉ាប្រឆាំងនឹងរដ្ឋាភិបាល?

**ជាម ឆានី** ជាការពិតដែលសមាជិកសភាយើងទាំង៥៥រូប ដែលសល់ពីការលួចសន្លឹកឆ្នោតរបស់លោក ហ៊ុន សែន មិនមានទទួលប្រាក់ខែពីសភាជាតិទេ ដើម្បីបន្តសកម្មភាពការពារជាតិដ៏ធំមហិមានោះ យើងប្រើធនធានក្នុងស្រុកគ្រប់យ៉ាងហើយ យើងនៅតែពឹងផ្អែកលើការគាំទ្រពីក្រៅស្រុកយ៉ាងរឹងមាំចំពោះសកម្មភាពសង្គ្រោះជាតិនឹងជីវភាពតំណាងរាស្ត្រយើង... ជាពិសេសទៅទៀតនោះ យើងនឹងមានការបោះឆ្នោតឃុំសង្កាត់នឹងមកដល់យើងរឹតតែនឹមានការពឹងផ្អែកទៅលើបងប្អូនក្រៅស្រុកកាន់តែច្រើនឡើងទៀតដើម្បីពង្រឹងជ័យជំនះគណបក្សសង្គ្រោះជាតិជូនប្រជាជាតិបន្តទៅទៀត ។

## តមកពីទំព័រទី ១ ចូលឆ្នាំខ្មែរនៅលីន

ជច ប៊ូស ជូនដំណើរដោយខ្មែរផុសស.រ.អា. បានទៅចូលរួមចំណែកអបអរសាទរបុណ្យចូលឆ្នាំខ្មែរនាវេលារសៀលនោះ ក្នុងបរិយាកាសអធិកអធម ។ នាឱកាសនោះដែរ លោកបានជួបសំណេះសំណាលជាមួយពលរដ្ឋខ្មែរនៅលីន - ថ្នាក់ដឹកនាំពីធីបុណ្យ ជាពិសេសលោក ហុង ណោត ដែលជាមន្ត្រីតំណាងរាស្ត្រសាលាក្រុងលីន ដែលជាអាមេរិកាំងដើមកំណើតខ្មែរតែម្នាក់គត់ដែលជាប់ឆ្នោតនៅរដ្ឋម៉ាសាឈូសែតនេះ ៕



លោក ហុង ណោត តំណាងរាស្ត្រក្រុងលីន ណែនាំប្រជាពលរដ្ឋឱ្យស្គាល់លោក លោក ស៊ី ចាន់ ស៊ីវ











## តមកពីទំព័រទី ១ "សាំភ្លីខ្មែរ" និង"ខ្មែរផុសស.រ.អា"....

២០០នាក់ បានមកជុំលរួមជាសាក្សីក្នុងការប្រកាសជ័យលាភីនេះ នៅសណ្ឋាគារដ៏ធំមួយ នា"ខាំប្រ៊ីឌ" លោកស្រីប្រធាន "ដាយយ៉ាន ពៅរណ័រ" បានឡើងថ្លែងអំណរគុណដល់ភ្ញៀវដល់សមាជិកដល់ពាជីជ្ជករជម្រើសមិននឹងប្រកាសឈ្មោះជ័យលាភី ដោយ "រីកឆីត ដេវេយ៍" ជាលេខា ។ ខាងខ្មែរយើងមិនបានទទួលចំណាត់ថ្នាក់ដ៏ខ្សត់បង្អស់នោះទេ តែរីករាយនឹងបានឃើញជនអន្តោប្រវេសន៍ឯទៀត ក្លាយជាជ័យលាភីបន្ទាប់ពីខិតខំយ៉ាងព្យាយាមច្រើនឆ្នាំ រហូតដល់បានសម្រេច ៕

WINNER: NEIGHBORHOOD BUSINESS

Rosa and Nisaury Tejeda and Victoria Amador

Tremendous Maid LLC
Jamaica Plain, MA
Country of origin:
Dominican Republic

The Immigrant Learning Center's

2014 IMMIGRANT ENTREPRENEUR AWARDS DINNER

Thursday, May 8, 2014
Royal Sonesta Hotel
Cambridge, Massachusetts

NOMINEES: NEIGHBORHOOD BUSINESS

Rosa and Nisaury Tejeda and Victoria Amador (Dominican Republic)
Tremendous Maid LLC, Jamaica Plain

Denise and Sambath Ban (Cambodia)
Simply Khmer Restaurant, Lowell

Victor Barros (Cape Verde)
Systemize Networks, Stoughton

Arturo Barroso (Mexico)
Boston Shoe Service, Boston

Edan Barshan (Turkey)
Universal Dental Plan, Boston

Alberto Calvo (Cuba)
Stop and Compare Supermarkets,
Chelsea and Lynn, MA, and Providence, RI

Javier Diaz (Dominican Republic)
Rincon Caribeno Restaurant, Hyde Park

Jose Antonio Guerrero (Mexico)
Cafe Azteca, Lawrence

Nai Nan Ko (Taiwan)
Ko Automotive Group, Wellesley

NOMINEES: NEIGHBORHOOD BUSINESS

Sabrina Tan and Chin Lee (Malaysia)
Flavours of Malaysia, Pittsfield

Ricardo Miranda (Uruguay)
Miranda Auto Body, Springfield

Phong Nguyen (Vietnam)
Yoki Restaurant, Cambridge and Medford

Mayur Patel (India)
Little Market, Acton

Roger Samkhon Pin and Sohen Pin (Cambodia)
KhmerPost USA, Lowell

Nabil and Joseph Sater (Lebanon)
The Middle East & Zuzu, Cambridge

Marcelo Silva (Brazil)
Somerville Sustainable Cleaning, Cambridge

Janet Hung and Delia Vildoso (Peru)
Tiny World Child Care Inc., Brookline

Weidong Wang (China)
Baba Sushi and Chuan Sushi Restaurants, Worcester

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដកស្រង់ប្រែសម្រួលពីកាសែតអង់គ្លេស អនុបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី០៧ ខែឧសភា ឆ្នាំ២០១៤

# មន្ត្រីអង្គការសហប្រជាជាតិបញ្ចប់ដំណើរទស្សនកិច្ច និងមានការ សោកស្តាយចំពោះអំពើហិង្សានៅកម្ពុជា

**By Lauren Crothers | May 3, 2014**

លោកស្រី ហ្វ្លាវៀ ប៉ានសៀរី (Flavia Pansieri) ឧត្តមស្នងការរងអង្គការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សបានបញ្ចប់ដំណើរទស្សនកិច្ចរយៈពេលប្រាំថ្ងៃមកកាន់ប្រទេសកម្ពុជា កាលពីថ្ងៃសុក្រ ដោយលោកស្រីលើកឡើងថា លោកស្រីព្រួយបារម្ភ និងមានការសោកស្តាយយ៉ាងខ្លាំង ចំពោះការវាយដំអ្នកឈរមើល និងអ្នកកាសែត បន្ទាប់ពីមានការជួបជុំគ្នានៅទិវាពលកម្មអន្តរជាតិ នៅជិតទីលានប្រជាធិបតេយ្យដែលត្រូវបានបិទជិត។

នៅក្នុងសុន្ទរកថា ត្រៀមទុកនៅឯការិយាល័យអង្គការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សប្រចាំទីក្រុងភ្នំពេញលោកស្រី ប៉ានសៀរី បានលើកឡើងថា លោកស្រីមានការសោកស្តាយដែលត្រូវធ្វើការសន្និដ្ឋានថា ស្ថានភាពសិទ្ធិមនុស្សនៅកម្ពុជាធ្ងន់ធ្ងរណាស់នៅឆ្នាំនេះ ដោយសារមានការបាញ់សម្លាប់មនុស្សប្រាំមួយនាក់ អំឡុងពេលកម្មកររោងចក្រកាត់ដេរធ្វើកូដកម្ម និងបម្រាមរបស់សាលារាជធានី និងរដ្ឋាភិបាលមិនឱ្យមានការជួបជុំគ្នា។

លោកស្រីបានមានប្រសាសន៍ថា "ការប្រើប្រាស់កម្លាំងហួសហេតុធ្វើឱ្យមានកង្វល់យ៉ាងខ្លាំងអំពីតួនាទីរបស់សន្តិសុខខណ្ឌនៅក្នុងការដោះស្រាយបាតុកម្ម និងសណ្តាប់ធ្នាប់សាធារណៈ"។ នៅចុងសប្តាហ៍នេះលោកស្រីបានជួបលោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសលោក ឳម យ៉ិនទៀង ប្រធានគណៈកម្មាធិការសិទ្ធិមនុស្ស និងមន្ត្រីសហជីពដែលត្រូវបានឃុំខ្លួននៅពន្ធនាគារព្រៃស។

លោកស្រីបានលើកឡើងថា "ខ្ញុំសូមលើកឡើងពីទស្សនៈនេះម្តងទៀតថា បម្រាមមិនឱ្យធ្វើបាតុកម្មនេះ **តទៅទំព័រទី ១៦**

# UN Human Rights Official Wraps Visit, 'Saddened' by Violence

**By Lauren Crothers | May 3, 2014**

U.N. Deputy High Commissioner for Human Rights Flavia Pansieri on Friday wrapped up a five-day mission to Cambodia, saying that she was concerned and "deeply saddened" by the violent beating of by standers and journalists after a May Day gathering near a cordoned-off Freedom Park.

In prepared remarks delivered at the OHCHR office in Phnom Penh, Ms. Pansieri said she regretted having to come to the conclusion that the human rights situation in Cambodia has deteriorated this year, punctuated by the killing of six people during garment strikes and an ongoing municipal and government ban on assembly.

"The use of excessive force raises serious concerns about the role of the district security guards in dealing with demonstrations and public order," Ms. Pansieri said at the end of a week that saw her meet with Foreign Minister Hor Namhong, Cambodian Human Rights Committee President Om Yentieng and unionists detained at Prey Sar prison.

"I reiterate the view that the 'ban' on demonstrations falls short of the test of legality, necessity and proportionality."

In an interview after her speech, asked if she had received any assurances from government officials that the state killings would be properly investigated, Ms. Pansieri said she had not.

"Let me say that I have mentioned [it during discussions], but I can't say I have received firm indications of what would be the next steps," she said.

"If there are objective reasons and documented evidence for sanctioning any behavior that goes against the law, that should happen irrespective of who is the perpetrator."

At Australia's request, the Cambodian government this week agreed in principle to accept asylum seekers intercepted while making their way to Australia, but Ms. Pansieri declined to comment on whether she considers Cambodia a desirable place to send refugees or asylum seekers.

"Do we want to say we are concerned and therefore we don't want to engage, or we say there are some issues, these are the principles that have to be applied and if they haven't been applied in the past, it is essential that guarantees are put in place?" she asked.

# ប្រទះឃើញសាកសពអ្នកកាសែតកាណាដាដែលបាត់ខ្លួន នៅតំបន់ព្រៃនៃឧទ្យានអង្គរ

By Matt Blomberg and Ben Sokhean | May 2, 2014

នគរបាលនិយាយថា សាកសពអ្នកកាសែត និងជាផលិតករភាពយន្តជនជាតិកាណាដាម្នាក់មុនត្រូវបានប្រទះឃើញកាលពីព្រឹកម្សិលមិញ នៅក្នុងបរិវេណប្រាសាទអង្គរធំ។

លោក ចៅ ម៉ៅវីរៈ នាយការិយាល័យនគរបាលអន្តោប្រវេសន៍ខេត្តសៀមរាបបានមាន




ឈ្មោះ ដេវ វ៉ក់ឃើ (Dave Walker) ដែលបានបាត់ខ្លួននៅក្នុងខេត្តសៀមរាប កាលពីជាងពីរខែ

ប្រសាសន៍ថា ក្មេងជំទង់ពីរនាក់ ដែលបានចូល **តទៅទំព័រទី ២០**

# Experts to Study Remains of Canadian Journalist

**By Khy Sovuthy | May 3, 2014**

Forensic experts hired by the Canadian Embassy in Thailand will arrive in Siem Reap on Saturday to examine bodily remains believed to be those of a missing Canadian journalist, officials said Friday.

Chao Mao Vireak, Siem Reap provincial immigration chief, said that a representative of the Canadian Embassy in Thailand had arrived in Siem Reap on Friday and that an examination of the remains would begin Saturday morning.

"The Canadian Embassy hired Thai examination experts, four doctors, two autopsy experts, a cameraman and an assistant to arrive in Siem Reap on Saturday," Mr. Mao Vireak said.

The remains were found inside the Angkor Thom temple complex by two teenage boys on Thursday morning.

A friend preliminarily identified the remains as those of Dave Walker, a Canadian journalist and filmmaker who disappeared in the province more than two months ago.

Pheng Pech, deputy chief of the Siem Reap technical and scientific police, said that Dave Walker's death was not being treated as a murder case.

"According to a doctor of the Siem Reap Provincial Court, the man died of heart failure," Mr. Pech said.

# ទឹកទទឹម ជួយកាត់បន្ថយខ្លាញ់ក្បាលពោះ

ទឹកទទឹមអាចជួយទប់ស្កាត់មហារីក និងមានអត្ថប្រយោជន៍ល្អសម្រាប់សុខភាពបេះដូងទៀតផង។ មិនតែប៉ុណ្ណោះ វាក៏អាចជួយកាត់បន្ថយជាតិខ្លាញ់ក្បាលពោះផងដែរ។

ក្រុមអ្នកស្រាវជ្រាវបាននិយាយថា ប្រភេទផ្លែឈើនេះមានឥទ្ធិពលក្នុងការកាត់បន្ថយជាតិខ្លាញ់ដែលនៅម៉ុំនៅត្រង់ក្បាលពោះ។ ជាមួយគ្នានេះដែរ ក្រុមអ្នកស្រាវជ្រាវក៏បានធ្វើការពិសោធន៍ទៅលើក្រុមអ្នកស្ម័គ្រចិត្តដែលត្រូវបានឱ្យទទួលទានទឹកទទឹមមួយដបជារៀងរាល់ថ្ងៃ។

លុះក្រោយមកលទ្ធផលបានបង្ហាញឱ្យឃើញថា ក្រុមអ្នកស្ម័គ្រចិត្ត **តទៅទំព័រទី ២២**

# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគូ សាមុត
តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤
តម្លៃ $10



CAMBODGE
តម្លៃ $5



អង្គការជានរណា?
បភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
**អាចទិញនៅអាស័យដ្ឋាន៖** 45 Merrimack St., Suite 218A, Lowell, MA 01852



**តមកពីទំព័រទី ១២ ទឹកទទឹម...**

មានអាត្រាតិចបំផុតនៅក្នុងការកកើតកោសិកាជាតិខ្លាញ់នៅត្រង់ម្តុំក្បាលពោះ។ ម្យ៉ាងវិញទៀត អ្នកទាំងនោះត្រូវបានគេរកឃើញថា ពួកគេមានសំពាធឈាមទាបជាងមុនដែលជាលទ្ធផលអាចកាត់បន្ថយគ្រោះថ្នាក់នៃការកើតជំងឺគាំងបេះដូង ជំងឺស្ត្រេស និងជំងឺក្រលៀន។

ក្រុមអ្នកស្រាវជ្រាវបានជឿជាក់ថា ទឹកផ្លែទទឹមអាចនឹងកាត់បន្ថយចំនួនអាស៊ីដខ្លាញ់នៅក្នុងឈាម ដែលត្រូវបានស្គាល់ថា NEFA ។

# ប្រជាជនកម្ពុជាខ្លះ បួសសងគុណឪពុកម្តាយ ខ្លះដើរដើម្បីសន្តិភាពក្នុងឱកាសបុណ្យវិសាខបូជា




នៅខេត្តសៀមរាបប្រជាជនកម្ពុជាមួយចំនួនបានកោរសក់បួសសងគុណឪពុកម្តាយក្នុងឱកាសបុណ្យវិសាខបូជាឆ្នាំនេះ។ នៅឯភ្នំពេញឯណោះវិញ ប្រជាជនខ្លះទៀត គ្រោងធ្វើធម្មយាត្រា ដើម្បីសាមគ្គីភាព និងសន្តិភាព។ ទាំងនេះជាការប្រារព្ធពិធីបុណ្យពុទ្ធសាសនាដែលបានក្លាយជាបុណ្យអន្តរជាតិនៅឆ្នាំ១៩៩៩។

ក្នុងឱកាសបុណ្យវិសាខបូជាឆ្នាំនេះ យុវជនកម្ពុជា៨៣២នាក់ មកពីខេត្តក្រចេះ ព្រះសីហនុ ព្រៃវែង រាជធានីភ្នំពេញ និងសៀមរាបផ្ទាល់ ដែលមានសទ្ធាជ្រះថ្លាក្នុងព្រះពុទ្ធសាសនាបានសម្រេចចិត្តសាងផ្នួសរយៈពេលមួយសប្តាហ៍ ដើម្បីបំពេញកតញ្ញូតាធម៌ ចំពោះឪពុកម្តាយរបស់ខ្លួន និងដើម្បីស្វែងយល់អំពីព្រះធម៌ ជាពិសេសសីលធម៌ និងចរិយាធម៌ក្នុងព្រះពុទ្ធសាសនា។ នេះបើយោងតាមទីភ្នាក់ងារសារព័ត៌មានកម្ពុជាដែលបានឱ្យដឹងថា ការបំបួសយុវជនទាំងនេះ បានចាប់ផ្តើមពីថ្ងៃទី១០ រហូតដល់ថ្ងៃទី១៥ ខែឧសភា ឆ្នាំ២០១៤ នៅវត្តអង្គរខាងត្បូងក្នុងខេត្តសៀមរាប។

នៅឯរាជធានីភ្នំពេញវិញ ក្រុមការងារដើម្បីសន្តិភាពដែលជាបណ្តាញអ្នកស្ម័គចិត្តនឹងធ្វើធម្មយាត្រា ដើម្បីប្រារព្ធបុណ្យវិសាខបូជានៅថ្ងៃអង្គារ ទី១៣ ខែឧសភានេះ ដោយមានអ្នកចូលរួមជាង៣០០នាក់។ ដោយធ្វើការជួបជុំយុវជនពុទ្ធសាសនិកឥស្លាមសាសនិក និងគ្រិស្តសាសនិកនៅចំនុចវត្តភ្នំវេលាម៉ោង០៧ និង៣០នាទីព្រឹកធម្មយាត្រានឹងចេញដំណើរទៅព្រះអង្គដងកើមុខព្រះបរមរាជវាំងមុននឹងបញ្ចប់កម្មវិធីនៅម៉ោង១០និង៣០នាទីព្រឹក។ បុណ្យវិសាខបូជាបានក្លាយជាបុណ្យអន្តរជាតិដោយសេចក្តីសម្រេចរបស់មហាសន្និបាទអង្គការសហប្រជាជាតិនៅឆ្នាំ១៩៩៩ ។ បើតាមបណ្តាញក្រុមការងារដើម្បីសន្តិភាពការរៀបចំព្រឹត្តិការណ៍នៅព្រឹកថ្ងៃទី១៣ ខែឧសភា មានគោលបំណងពង្រឹងសាមគ្គីភាពយ៉ាងស្អិតស្មាលរវាងសាសនិកនានា ដែលស្រឡាញ់សន្តិភាព ដើម្បីផ្សព្វផ្សាយមេត្តាធម៌ដល់សព្វសត្វទូទាំងសាកលលោកឱ្យយល់ដឹងអំពីគោលការណ៍នៃសន្តិភាពរវាងគ្នានិងគ្នា។ បណ្តាញនេះក៏អញ្ជើញប្រជាជនទូទៅឱ្យចូលរួមក្នុងធម្មយាត្រានេះដែរ ៕

Continued from Page 19

# CHARLESTON, SOUTH ...

## Park Service site.

After the war, the destroyed sections of the city were rebuilt with majestic houses at the bottom of the peninsula followed by a large stripe of commercial buildings filled with banks, law offices and retail space. Further up the peninsula is the tourist district filled with hotels, restaurants, shops and historic businesses. Finally you have two colleges, the Citadel military academy and the College of Charleston. Beyond that is more affordable residential areas mixed with large industrial and shipping enterprises (the port of Charleston is one of the busiest cargo and passenger hubs on the east coast). On the drive back to the airport, we passed an enormous Boeing facility where the Dreamliner is being assembled which made me recall past news stories about Boeing moving this plant from union-friendly Washington state to union-hostile South Carolina. Thinking of the textile mills leaving Lowell in the 19th century for the same reason, I was reminded that history does indeed repeat itself.

Charleston does a great job of using history to drive tourism which in turn drives retail and the arts. During our stay we attended a locally-produced play at the Charleston equivalent of the MRT and spent Sunday afternoon strolling along King Street, the main retail area, which is closed to vehicles on the second Sunday of the month for a street fair that gets many people - mostly locals from the looks of it - into the shops and restaurants that line the streets. Although the city is quite walkable, a free shuttle bus continuously circles the downtown, moving tourists mostly from hotels to historic sites to dining establishments.

Like every city, Charleston undoubtedly has plenty of problems, but my visits back in 2010 and again last weekend showed the city does a lot of things right, things that Lowell is trying to do or do better. In April of 1861, the gaze of Lowell's leaders focused on Charleston; perhaps in 2014 it's time for that to happen once again.

តមកពីទំព័រទី ៥

## ខ្ទឹមក្រហមជួយបំបាត់រោគផ្ដាសាយ....

មើមមកដំចិញ្ច្រាំ ឬចិតជាបន្ទះស្ដើងៗរួចដាក់ក្នុងកូនចានទុកលើក្បាលដំណេកក្បែរខ្នើយ អាចជួយបំបាត់ក្លិនស្អុយពីការហប់ស្អុយរបស់បន្ទប់បានយ៉ាងល្អ ។



២-ដំខ្ទឹមក្រហមល្មមបែកប្រេះ ហើយយកមកដាក់នៅលើខ្នើយក្នុងពេលដេកយប់នោះ នឹងធ្វើឱ្យក្លិនក្រអូបប្រហើររបស់ខ្ទឹមក្រហមអាចជួយកាត់បន្ថយអាការតឹងច្រមុះដកដង្ហើមស្រួលជាងមុន និងអាចបំបាត់អាការហៀរសំបោរបានយ៉ាងឆាប់រហ័សដែលអាចជួយកូនតូចរបស់អ្នកដេកលង់លក់បានស្រួលពេញមួយយប់ ។

៣-បុកខ្ទឹមក្រហមឱ្យម៉ដ្ឋរួចយកមកលាបស្ដើងៗត្រង់បរិវេណចុងបង្ហើយរបស់កូនតូចក៏ប្រើបានផលដូចគ្នា ។

៤-ក្នុងពេលកូនតូចមិនដេកពួនសាកល្បងប្រើវិធីដុតមើមខ្ទឹមក្រហមមួយមើមឱ្យក្រៀមល្មម ហើយយកទៅឱ្យកូនស្រូបក្លិនដើម្បីកាត់បន្ថយអាការតឹងច្រមុះក៏អាចជួយឱ្យកូនតូចដេកលង់លក់បានស្រួលដូចគ្នា ។

*សម្រាប់មនុស្សធំ ១-សាកល្បងដំខ្ទឹមក្រហមមួយមើមល្មមឱ្យបែក ហើយដាក់ក្នុងទឹកក្ដៅឆុងផឹកបំបាត់អាការផ្ដាសាយ ។

២-បង្អើបគម្របឆ្នាំងបន្តិចដើម្បីឱ្យចំហាយទឹកមកប៉ះបរិវេណផ្ទៃមុខសម្រាប់ជួយកាត់បន្ថយអាការផ្ដាសាយ ។

៣-ស្រូបចំហាយទឹកសន្សឹមៗបញ្ចូលក្នុងខ្លួន ។

*ប្រយ័ត្នកុំបើកគម្របឆ្នាំងមកទាំងអស់ប្រយ័ត្នចំហាយទឹករលាកផ្ទៃមុខ ។

*វិធីណែនាំសាកល្បងប្រើកន្សែងពោះគោឃ្លុំក្បាលនៅពេលស្រូបយកក្លិនខ្ទឹមក្រហមពីឆ្នាំងនោះនឹងផ្ដល់ផលល្អកាន់តែទ្វេដងឡើង ។

៤-ខ្ចប់ខ្ទឹមក្រហមដែលដំហើយយកមកជូតមុខ រួចហើយរុំទុកត្រង់កនោះ នឹងជួយឱ្យអាការផ្ដាសាយអាការតឹងច្រមុះទាំងមនុស្សចាស់ និងកុមារទទួលផលល្អដូចគ្នា ៕

តមកពីទំព័រទី ១៣ ទាហានរារាំងគណបក្សសង្គ្រោះជាតិ...

បានយករនាំងដែកពណ៌ក្រហមបិទផ្លូវទីមួយៗចេញពីរង្វង់មូលក្រុងនេះ។ ទាហានប្រដាប់ដោយកាំភ្លើងអាកា-៤៧បានដើរចុះដើរឡើងនៅចម្ងាយប្រហែលពីរបីរយម៉ែត្រពីក្រោយផ្លូវបិទនីមួយៗ ខណៈដែលរថយន្តហ្ស៊ីបដែលមានអាវុធចតនៅពីក្រោយនោះមានបំណងរារាំងអ្នកធ្វើយុទ្ធនាការឃោសនាដែលត្រូវទៅទីនោះ។

លោក ប៊ុនរឿន បានសួរមន្ត្រីយោធាទទួលបន្ទុកបិទផ្លូវចូលក្រុងនេះថា "យើងមានផែនការមកតាមផ្លូវនេះ។ ហេតុអ្វីបានជាអស់លោកបិទផ្លូវនេះ?"។ មន្ត្រីរូបនោះបានឆ្លើយថា "នេះជាបទបញ្ជាមកពីថ្នាក់លើ"។

បន្ទាប់ពីមានការជជែកគ្នាយ៉ាងតានតឹងរយៈពេល៥នាទីដោយលោក ប៊ុន រឿន បានទទូចម្ដងហើយម្ដងទៀតសុំឱ្យមន្ត្រីរូបនោះអនុញ្ញាតឱ្យធ្វើយុទ្ធនាការកាត់តាមកងកម្លាំងទាំងនេះ លោក កឹម សុខា បានចេញមកពីរថយន្តរបស់លោកប្រាប់ឱ្យអ្នកគាំទ្រដកចេញដើម្បីចៀសវាងកុំឱ្យមានអំពើហិង្សាណាមួយ។ អនុប្រធានគណបក្សសង្គ្រោះជាតិរូបនេះបានស្រែកប្រាប់ក្រុមអ្នកគាំទ្របន្ទាប់ពីមានភាពតានតឹងថា "គណបក្សសង្គ្រោះជាតិមិនមែនមកធ្វើសង្គ្រាមទេ"។ លោកបានលើកឡើងដោយប្រើពាក្យប្រមាថវៀតណាមថា "នេះមិនមែនជាសមរភូមិមុខទេ។ សមរភូមិមុខនៅភាគខាងលិច។ សមរភូមិមុខ គឺត្រូវប្រឈមមុខនឹងយួនដែលកំពុងយកទឹកដីខ្មែរយើង"។

បន្ទាប់មកលោក សម រង្ស៊ី បាន ប្រកាសថាការធ្វើយុទ្ធនាការនេះត្រូវឆ្លងទន្លេមេគង្គទៅកាន់ផ្សារនៅក្រុងសួងក្នុងខេត្តត្បូងឃ្មុំ។ នៅតាមផ្លូវទៅកាន់ផ្សារនោះមាននគរបាល និងកងរាជអាវុធហត្ថជាច្រើន ប៉ុន្តែមិនមានទាហានទេ។

លោក សេង កុសល ទាហានម្នាក់ដែលឈរយាមផ្លូវធំទៅកាន់ក្រុងកំពង់ចាមបាននិយាយថាទាហានមកឈរ ជើងដើម្បីការពារកិច្ចប្រជុំមួយនៅទីនោះ។ គាត់បាននិយាយថា "យើងមកទីនេះដើម្បីការពារសន្តិសុខ ហើយយើងបានបិទផ្លូវនេះពីព្រោះមានកិច្ចប្រជុំរបស់ថ្នាក់ដឹកនាំនៅទីនោះ។ ប្រសិនបើមានអំពើហិង្សាយើងនឹងបង្ក្រាប"។

លោក ចិត្រ ម៉ាន់ មេបញ្ជាការរងកងវរសេនាតូចប្រចាំខេត្តកំពង់ចាមបានបដិសេធថា មិនមានការដាក់ពង្រាយទាហានទេកាលពីម្សិលមិញ។ វរសេនីយ៍ ឯក ចិត្រ ម៉ាន់ បាននិយាយថា "ខ្ញុំបានទៅក្រុងកំពង់ចាមដើម្បីទិញគុយទាវ ហើយបានឃើញរនាំងបិទផ្លូវនៅជិតផ្លូវនោះ ។ នគរបាល និងកងរាជអាវុធហត្ថជាអ្នកបិទនេះជាការងាររបស់ពួកគេ។ មិនមានទាហាននៅទីនោះទេ"។

លោក លន់ លឹមថៃ អភិបាលខេត្តកំពង់ចាមបានមានប្រសាសន៍ថា គណបក្សប្រឆាំងមិនត្រូវបានអនុញ្ញាតឱ្យធ្វើយុទ្ធនាការនៅតាមផ្លូវបិទនេះ និងចំណតរថយន្តនៅជិតនោះទេ។ លោកបាននិយាយថា "អភិបាលក្រុងមិនអនុញ្ញាតឱ្យពួកគេធ្វើយុទ្ធនាការនៅទីនោះទេ ពីព្រោះផ្លូវនោះតូច។ វាធ្វើឱ្យប៉ះពាល់ដល់សន្តិសុខសណ្ដាប់ធ្នាប់សាធារណៈ និងអាចធ្វើឱ្យប៉ះពាល់ដល់មនុស្សរាប់ម៉ឺននាក់"។

លោក លឹមថៃ បាននិយាយថា "ក្រៅពីកន្លែងទាំងពីរនេះ យើងមិនហាមឃាត់ពួកគេទេ។ យើងមានកន្លែងជាច្រើនដូច្នេះហេតុអ្វីបានជាពួកគេចង់បានតែកន្លែងទាំងពីរនេះ? យើងអាចគិតពីបញ្ហាទាំងនេះជាមួយគ្នា"។

បន្ទាប់ពីថ្លែងសុន្ទរកថារយៈពេលខ្លីពេលឆ្លងទន្លេទៅដល់ក្រុងសួងលោក សម រង្ស៊ី និងលោក កឹម សុខា បានដឹកនាំក្រុមអ្នកគាំទ្រត្រឡប់មកការិយាល័យគណបក្សរបស់ខ្លួនវិញនៅខាងលិចក្រុងនេះ ដែលនៅទីនោះមានក្រុមប្រឹក្សាឃុំសង្កាត់ជាង៥០០នាក់មកពីគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សកំពុងរង់ចាំ។

នៅថ្ងៃទី១៨ខែឧសភា ក្រុមប្រឹក្សាឃុំសង្កាត់ទូទាំងប្រទេសដែលបានជាប់ ឆ្នោតកាលពី មិថុនា ឆ្នាំ២០១២ នឹងបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សានៅតាមស្រុក ខណ្ឌខេត្តក្រុងរបស់ខ្លួន។ គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សបានរួមបញ្ចូលគ្នាបង្កើតជាគណបក្សសង្គ្រោះជាតិ កាលពីខែកក្កដា ឆ្នាំ២០១២។

លោក ប៊ុនរឿន បានប្រាប់សមាជិកក្រុមប្រឹក្សាឃុំសង្កាត់របស់គណបក្សប្រឆាំងកុំឱ្យភ្លេចទៅបោះឆ្នោតនៅថ្ងៃបោះឆ្នោត ដើម្បីឱ្យគណបក្សសង្គ្រោះជាតិទទួលបានអាសនៈក្រុមប្រឹក្សាស្រុក

តទៅទំព័រទី ៣១


**KhmerPost USA, LLC**

**សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក**

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ Editorials

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស Contributed Writers:

Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis

ច្នៃសោភ័ណភាពកាសែត Design Artist

Heng Chhunleng

ជំនួយការរដ្ឋបាល Administrative Assistant

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ពិសារទឹកប៉េងប៉ោះ១ថ្ងៃ ជួយកំចាត់ជំងឺឆ្អឹង

ក្រុមអ្នកវិទ្យាសាស្ត្រនិយាយថា ការពិសាទឹកប៉េងប៉ោះ២កែវក្នុងមួយថ្ងៃជួយពង្រឹងឆ្អឹង ហើយអាចបញ្ចៀសនូវជំងឺឈឺសន្លាក់ឆ្អឹងបាន ។

គ្រឿងផ្សំសំខាន់ត្រូវគេគិតថា គឺជាសារធាតុលីកូពីន (Lycopin) ដែលជាសារធាតុប្រឆាំងជាតិពុល ហើយអាចកាត់បន្ថយគ្រោះថ្នាក់នៃជំងឺមហារីកក្រពេញសម្រាប់បុរស និងការពារប្រឆាំងនឹងជំងឺបេះដូង ។

ក្រុមអ្នកស្រាវជ្រាវនៅឯសាកលវិទ្យាល័យតូរ៉ុនតូក្នុងប្រទេសកាណាដាបានស្នើស្ត្រី ក្រោយពេលមានរដូវចំនួន៦០នាក់ មានអាយុចាប់ពី៥០-៦០ឆ្នាំ ឱ្យកាត់ផ្តាច់ការប្រើប៉េងប៉ោះនៅក្នុងរបបអាហាររបស់ពួកគេសម្រាប់រយៈពេល១ខែ ។

ការកាត់ផ្តាច់នេះ បាននាំឱ្យមានការបង្កើនកម្រិត N-telopetid ដែលជាសារធាតុគីមីមួយនៅក្នុងឈាមដែលបញ្ចេញចូលទៅក្នុងចរន្តឈាមនៅពេលដែលឆ្អឹងត្រូវបាក់ ។

បន្ទាប់ពីរយៈពេល៤ខែក្រោយមកស្ត្រីទាំងនោះត្រូវបានផ្តល់ទឹកដមប៉េងប៉ោះមួយដូសជារៀងរាល់ថ្ងៃដោយមានផ្ទុកសារធាតុលីកូពីន១៥មិល្លីក្រាម ។ ការផឹកទឹកដមប៉េងប៉ោះនេះបាននាំទៅរកការធ្លាក់ចុះយ៉ាងច្រើននូវកម្រិតនៃសារធាតុ N-telopetid ក្នុងខ្លួនស្ត្រីដែលផឹកទឹកប៉េងប៉ោះ ឬក៏លេបឱសថប៉េងប៉ោះ ។

ក្រុមអ្នកស្រាវជ្រាវនិយាយថា ទឹកប៉េងប៉ោះ គឺជាអាហារដ៏ល្អដែលសម្បូរទៅដោយសារធាតុលីកូពីន ។ ផឹកទឹកប៉េងប៉ោះក្នុង១ថ្ងៃដែលមានផ្ទុកសារធាតុលីកូពីន១៥មិល្លីក្រាមអាចមានកម្លាំងគ្រប់គ្រាន់ក្នុងការពង្រឹងឆ្អឹងដែលស្រួយបាន ៕



តមកពីទំព័រទី ៧ បច្ចុប្បន្នភាពនៃក្រុងខ្មែរ...

ពីចំណុចត្រីកោណឡើងទៅចំណុចក្បែរអគារមជ្ឈមណ្ឌលអាស៊ាននៃផ្លូវទាំងពីរ ។

ខាងកិច្ចការរដ្ឋបាលអាមេរិកក្រុងខ្មែរកំពុងជួបទាក់ទងបន្តទៀតទៅសាលាក្រុងខ្មែរឯខាងប្រទេសខ្មែរក្រុងខ្មែរបានភ្ជាប់ទំនាក់ទំនងជាមួយមន្ត្រីនៃក្រសួងវប្បធម៌នៃព្រះរាជាណាចក្រកម្ពុជាដែលនឹងសម្រួលទាំងខាងការសាងសង់រូបសំណាកព្រហ្មបាយ័នការដឹកជញ្ជូន និងទិដ្ឋាការ ។

ទាក់ទិននឹងបុព្វហេតុ ក៏ដូចជាវត្ថុបំណងនៃការសាងសង់រូបសំណាកព្រហ្មបាយ័ននេះឡើង គឺសំដៅបម្រើការទ្រទ្រង់កេរ្តិ៍ដំណែលសិល្បៈវប្បធម៌ខ្មែរអាស្រ័យលើអាតិភាពនៃព្រហ្មមុខបួនដែលនឹងលេចរូបរាងឡើង ប្រសិនបើគម្រោងនេះបានសម្រេចជាស្ថាពរ ។ អនាគតក្រុងខ្មែរមានសេចក្តីសង្ឃឹមថា រូបសំណាកព្រហ្មបាយ័នមួយនេះនឹងក្លាយជាទីកន្លែងទេសចរណ៍ និងទីតាំងដែលកូនខ្មែរអាមេរិក និងអន្តរជាតិបានស្វែងយល់ពីព្រលឹងជាតិខ្មែរ ៕






# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ — www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ៏កក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងធានានូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។



## មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម (ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ)
- ម្ហូបខ្មែរក្តៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips



**សូមហៅលេខទូរស័ព្ទ (978) 596-1111**




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

ជាសេវាមានគុណភាពខ្ពស់ និងឧត្តមចិត្តបាន
បុគ្គលិកមានសណ្តានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ



Compassionate Care & Reliable
Professional & Cultural Sensitive
Management & Staffs speak Khmer

កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហារាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្តល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្តង ។

Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

To be eligibled for GAFC you must:

- -រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)
- -អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)
- -មាសហែលស្តង់ដា (eligible for Masshealth Standard)
- -ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀក-ពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)
- -មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអក (have physician statement of your condition)
- -ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )

### ផលប្រយោជន៍ទទួលបាន :

Benefits you will get:

- -ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)
- -ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)
- -ផែនការថែរទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីឈើ (an individual care plan developed by a registered nurse and case manager)
- -វាយតំលៃលើសេចក្តីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)
- -សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

**ដើម្បីចុះឈ្មោះសូមទាក់ទងមក**
To register, please contact:



Iolkyath Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404, Lowell, MA 01852



Chhavan Pin: Lynn, Revere, Boston
Tel:(617)783-7177, Fax: (617) 783-7188
Office: 214 Lincoln St., Suite 200, Allston, MA 02134



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំអាង



## ឆ្នាំជូត

រាល់ការបំពេញការងារទាំងឡាយ លោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហា ចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕



## ឆ្នាំឆ្លូវ

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហា គូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕



## ឆ្នាំខាល

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕



## ឆ្នាំថោះ

រាល់ការស្អប់ស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕



## ឆ្នាំរោង

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕



## ឆ្នាំម្សាញ់

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕



## ឆ្នាំមមី

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មីព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕



## ឆ្នាំមមែ

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕



## ឆ្នាំវក

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕



## ឆ្នាំរកា

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕



## ឆ្នាំច

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាឃីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕



## ឆ្នាំកុរ

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

# វីរបុរសដែលគួរចងចាំ
# នួន ឌួន (១៩១០-១៩៦៦)


១-លោក នួន ឌួន


២-លោកស្រី ម៉ិញ សំយ៉ើន


៣-លោក នួន ឌួន

**តពីលេខមុន**

តែងតែទេសនាបញ្ចេញគំនិតបដិវត្តន៍មានទាំងទៅទេសនានៅក្នុងបន្ទាយទាហានៈ ទាហានជើងក្រហម (ទាហានចម្បាំង) និងទាហានជើងខ្មៅ(ក្រុមរក្សាស្រុក)ឱ្យភ្ញាក់រលឹកទៀតផង ។ ចំពោះបារាំងវិញ ភិក្ខុ ហែម ចៀវ មានសង្ឃដីកាថា "ប្រទេសយើងមិនដឹងពេលណារួចពីខ្ញុំបារាំងទេ ។ បារាំងមកត្រួតត្រាស្រុកយើងហិនហោចទ្រព្យសម្បត្តិអស់...អាត្មាធ្វើបុណ្យរាល់ថ្ងៃបួងសួងសុំឱ្យខ្មែរបានឯករាជ្យមកវិញ ដើម្បីកុំឱ្យបរទេសជិះជាន់យើងទៅទៀត ។

នៅឆ្នាំ១៩៤០កងទ័ពជប៉ុនបានចូលមកដល់ឥណ្ឌូចិន ដើម្បីវាយកំចាត់សត្រូវរបស់ខ្លួន គឺបារាំង។ នៅកម្ពុជាវត្តមានទ័ពជប៉ុនជាបង្អែកមួយសម្រាប់អ្នកប្រឆាំងបារាំង ។ លោក សឺង ង៉ុកថាញ់ តែងតែទៅបន្ទាយទ័ពជប៉ុនសុំការគាំទ្រពីជប៉ុន ។ ក្រុមបដិវត្តន៍បាតស៊ូធ្វើសកម្មភាពរបស់ខ្លួនមមាញឹក ដើម្បីឱ្យទាន់ស្ថានការណ៍សាកលលោកនៅអឺរ៉ុប ជាពិសេសនៅឥណ្ឌូចិន ។ ភិក្ខុ ហែម ចៀវ បាននិមន្តទៅអប់រំខ្មែរស្រុកស្រែចំការជាញឹកញយ ដើម្បីសុំការឧបត្ថម្ភពីប្រជារាស្ត្រគ្រប់មធ្យោបាយ ទាំងផ្លូវចិត្ត និងផ្លូវសម្ភារៈ ។ នៅថ្ងៃទី១៧ កក្កដា ១៩៤២ មានចាងហ្វាងតិញបារាំងម្នាក់លេខាធិការខ្មែរពីរនាក់ទៀត មានទាំងកាន់សំណុំលិខិតផង បានទៅជួបលោក អ៊ុំង អ៊ី នាយករដ្ឋមន្ត្រី, លោក ទា សាន រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងធម្មការ, លោក ជុំ មួង (លេខាធិការ លោក ទា សាន) ។ លោក ទា សាន បានបញ្ជាទៅលោក ជុំ មួង ឱ្យទៅនិមន្តភិក្ខុ ហែម ចៀវ ។ ពេលដែលភិក្ខុ ហែម ចៀវ និមន្តមកដល់លោក ទា សាន បានបង្គាប់ឱ្យផ្លាស់ស្បង់ចីពរពីខ្លួនឱ្យស្លៀកពាក់ខោអាវរួចបារាំងនាំខ្លួនបាត់ទៅ ។ ក្នុងពេលជាមួយគ្នានេះលោក នួន ឌួង ជាសិស្សភិក្ខុ ហែម ចៀវ ធ្វើការក្រុមជំនុំព្រះត្រ័យបិដកក៏ត្រូវតិញបារាំងចាប់នៅឯផ្ទះដែរ ។

**នៅថ្ងៃ២០ កក្កដា ១៩៤២** គ្មាននៅរង់ចាំទេ ៣ថ្ងៃក្រោយមកមានបាតុកម្មលើកទី១ កើតមាននៅភ្នំពេញទាមទារឱ្យបារាំងដោះលែងអាចារ្យ ហែម ចៀវ, លោក នួន ឌួង ។ ក្នុងចំណោមមេដឹកនាំបាតុកម្មមានលោក សឺង ង៉ុកថាញ់, ប៉ាច ឈឺន, ប៊ុណ្ណ ច័ន្ទម៉ុល, ជុំ មួង, ភិក្ខុ ប៉ាង ខាត់, អ៊ុក ជា, ខៀវ ជុំ.... រួមមានគ្នារាប់ពាន់នាក់ដៃកាន់មេជានិយាយ "**យើងខ្ញុំសូមឱ្យដោះលែងលោកគ្រូអាចារ្យ ហែម ចៀវ និងលោក នួន ឌួង មកវិញ**" ដើរសំដៅទៅវិមានទេសាភិបាលបារាំង ។ បាតុកម្មនេះបានក្លាយទៅជាការប្រយុទ្ធគ្នារវាងបាតុករទៅពួកគាំទ្របារាំង ។ ខាងបាតុករមានប្រើដុំថ្ម ដំបងបាញ់កូនតឹងព្រះសង្ឃក៏បាន **បើកឆ័ត្រការពារខ្លួនដែរ** ។ ពេលកំពុងវាយប្រឡុកគ្នា ឬបន្ទាប់ពីបាតុកម្មមានបាតុករជាច្រើនត្រូវបារាំងចាប់បាន មានលោក ប៉ាច ឈឺន, ប៊ុណ្ណ ច័ន្ទម៉ុល, ...ឯលោក សឺង ង៉ុកថាញ់ បានគេចទៅបាងកកភិក្ខុ អ៊ុក ជា, ខៀវ ជុំ បានគេចទៅសៀមដែរ (ភិក្ខុ អ៊ុក ជា គង់នៅស្រុកសៀមរហូតមក) ភិក្ខុ ប៉ាង ខាត់ គេចរួច ហើយក៏ប្រគល់ខ្លួនឱ្យបារាំងចាប់វិញ លោក ជុំ មួង គេចទៅបាត់ដំបង... ។ ខ្មែរស្នេហាជាតិទាំងព្រះសង្ឃទាំងគ្រហស្ថដែលបារាំងចាប់បានបារាំងដាក់ក្នុងទីឃុំឃាំងរួចបញ្ជូនទៅគុកធំភ្នំពេញទុកកាត់ទោស ។ ជនជាប់ទោសនឹងត្រូវបារាំងបញ្ជូនតាមកប៉ាល់ទៅគុកធំនៅព្រៃនគរ ។ តើវាសនាអ្នកទាំងនេះក្លាយទៅយ៉ាងណា?

### ទទួលទោសប្រហារជីវិតបន្ថយមកទទួលទោសធ្វើការជាទំងន់មួយជីវិត

ជនជាប់ទោសត្រូវបានបារាំងបញ្ជូនតាមកប៉ាល់ពីគុកធំភ្នំពេញ ទៅគុកធំព្រៃនគរឱ្យតុលាការកាត់ទោស ។ អ្នកទោសទាំងនោះមានអាចារ្យ ហែម ចៀវ, នួន ឌួង, ប៉ាច ឈឺន, ប៊ុណ្ណ ច័ន្ទម៉ុល, ប៉ាង ខាត់។ អាចារ្យ ប៉ាង ខាត់ បានត្រូវរួចខ្លួន, លោក ប៊ុណ្ណ ច័ន្ទម៉ុល បានត្រូវទទួលទោសគុក ៥ឆ្នាំ និងបង្ខំនិរទេសមិនឱ្យចូលស្រុក១៥ឆ្នាំទៀត។ អាចារ្យ ហែម ចៀវ, នួន ឌួង, ប៉ាច ឈឺន, ជាដំបូងត្រូវទទួលទោសប្រហារជីវិតតែត្រូវលោកសេនាប្រមុខរដ្ឋាភិបាលបារាំងសំរាលទោសឱ្យលោកទាំងបីរូបជាប់គុកមួយជីវិតវិញដោយធ្វើការជាទម្ងន់ ។ នៅខែមិថុនា ១៩៤៣ អ្នកទោសទាំងនោះ បានត្រូវបារាំងបញ្ជូនទៅគុកធំនៅកោះត្រឡាច ។

**តទៅលេខក្រោយ**

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

កណ្តាលភាគទក្សិណ ដែលជាកូនខ្មែរកាត់យួនម្នាក់ឈ្មោះ ស៊ីវ ហេង ។

នៅថ្ងៃទី១៤ មករា ១៩៥០ លោក អៀវ កើស អគ្គលេខាធិការនៃគណៈបក្សប្រជាធិបតេយ្យ ត្រូវបានគេធ្វើឃាតដោយគ្រាប់បែកដៃ នៅក្នុងទីស្នាក់ការនៃគណកបក្សប្រជាធិបតេយ្យ នៅផ្លូវកេពិកេ ភ្នំពេញ ។ រឿងនេះបាននាំពួកប្រជាធិបតេយ្យកាន់តែប្រឆាំងនឹងរាជរដ្ឋាភិបាល យ៉ែម សំបូរ ខ្លាំងឡើងៗ រហូតនាំឱ្យសិស្សវិទ្យាល័យស៊ីសុវត្ថិបះបោរធ្វើកូដកម្មប្រឆាំងនឹងរដ្ឋាភិបាលទៀតផង ។ ចាប់តាំងពីពេលនោះមកនៅពេលធ្វើបុណ្យកឋិននៅវិទ្យាល័យស៊ីសុវត្ថិ ពួកឆែយាំសិស្សបានច្រៀងថា "**ហៃមាស សាឯម ! ហៃ យ៉ែម សំបូរ ! បើកកាស៊ីណូ ! បិទវិទ្យាល័យ! ហ៊ុយ ម៉ោងៗ ។**


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

អសន្តិសុខនៅក្នុងប្រទេសបានកើនដល់កម្រិតខ្ពស់បំផុត ។ ការដឹកជញ្ជូនតាមផ្លូវជាតិនានា ទោះបីមានទីតាំងនៅតាមផ្លូវដែលហៅថាប្លក់កូសក៏ដោយ ចរាចរក៏ត្រូវតែធ្វើនៅក្រោមការគាំពារនៃក្បួនរថយន្តទាហានដែរ ។ នៅតាមស្រុកស្រែចំការ ពួកយៀកមិញនៅតាមភូមិភាគខាងត្បូង និងខាងកើតប្រទេសបានបង្កើនសកម្មភាពត្រង់តំបន់ខ្លះ ដែលពួកគេកាន់កាប់ហាក់ដូចជារដ្ឋាភិបាលមួយដែរ ។ នៅប៉ែកខាងជើង និងខាងលិចប្រទេសឥស្សរដែលមិនទាន់ចូលដៃជាមួយយៀកមិញនោះ ក៏បានកាន់កាប់ទឹកដីមួយចំនួនដែរ ។ ចំណែកឯនៅទីក្រុងធំៗ ជាពិសេសរាជធានីភ្នំពេញ ពួកយៀកមិញក៏ធ្វើសកម្មភាពខ្លាំងណាស់ដែរ គេបានបង្កើតក្រុមសម្ងាត់ក្នុងកិច្ចផ្តល់ស្បៀងអាហារ.អង្គាសប្រាក់កាស.ថ្នាំពេទ្យជាដើម ដែលពួកគេបានជ្រើសរើសសមាជិក ក្នុងចំណោមជនជាតិយួន ដែលរស់នៅក្នុងប្រទេសកម្ពុជាពីយូរអង្វែងមកហើយ ហើយដែលបានចូលស៊ុបក្នុងសង្គមខ្មែរនោះឱ្យទទួលកិច្ចការនេះ ។ ក្នុងរយៈពេលជាមួយគ្នានេះ ពួកគេបានបញ្ជូនកងកម្លាំងយួនយៀកមិញចំនួន ៣.០០០នាក់ឱ្យចូលមកទីតាំងនៅក្នុងខេត្តស្វាយរៀង និងព្រៃវែង តាមសេចក្តីស្នើពីពួកខ្មែរយៀកមិញ ។

នៅចំពោះមុខស្ថានការណ៍ដ៏គួរឱ្យបារម្ភនេះ លោក យ៉ែម សំបូរ បានស្នើសុំទៅបារាំងឱ្យឆាប់ផ្ញើអាវុធឱ្យគ្រប់គ្រាន់ សម្រាប់បំពាក់ឱ្យកងកម្លាំងខ្មែរប្រមាណ៥០០០នាក់ ។ បារាំងយល់ស្ថានការណ៍ដូច្នេះ ក៏ទាមទារឱ្យលោក យ៉ែម សំបូរ ចុះហត្ថលេខាលើកិច្ចព្រមព្រៀងបណ្តោះអាសន្នមួយដាក់ឱ្យកងខេមរៈភូមិន្ទឱ្យនៅក្រោមបញ្ជាការរបស់បារាំង ។ ពេលនោះមិនត្រឹមតែបារាំងទេ សូម្បីគណបក្សប្រជាធិបតេយ្យក៏ធ្វើការគាបសង្កត់ស្តេចសីហនុ ឱ្យទម្លាក់លោក យ៉ែម សំបូរ ដែរ ។

ថ្ងៃទី០៣ ឧសភា ១៩៥០ ព្រះចៅស៊ីហនុ ក៏បានបញ្ឈប់រដ្ឋាភិបាល យ៉ែម សំបូរ ដោយសារមានការគំរាមកំហែងពីបារាំង ។ នៅក្នុងកំឡុងឆ្នាំ១៩៥០-១៩៥១ បន្ទាប់ពីមានវិបត្តិគណរដ្ឋមន្ត្រីផ្ទួនៗពេក (គឺរដ្ឋាភិបាលសម្តេចក្រុមហ្លួងមុនីពង្ស) តមករដ្ឋាភិបាលវេជ្ជបណ្ឌិត ទិព ម៉ម. តមកទៀតរដ្ឋាភិបាល អ៊ុម ឈាងស៊ុន) ព្រះបាទសីហនុ ក៏ដើរតួជាអ្នកផ្សះផ្សារម្តង គឺលើកនេះទ្រង់ខំព្យាយាមសម្រុះសម្រួលរឿងដែលទ្រង់បានញុះញង់បំបែកបំបាក់ពីមុនមកនោះថា កុំឱ្យមានការខឹងសម្បារនឹងគ្នា កុំប្រកាន់គ្នា សុំឱ្យរួបរួមសាមគ្គីគ្នាឡើងវិញក្នុងរាជរដ្ឋាភិបាលបង្រួបបង្រួមជាតិមួយដែលមានលោក យ៉ែម សំបូរ ជាអ្នកដឹកនាំ។ ប៉ុន្តែវិធានការនេះមិនបានជាការអ្វីសោះឡើយ ។ ឯលទ្ធផលនៃការបោះឆ្នោតនៅថ្ងៃទី ៩កញ្ញា ១៩៥១ បានផ្តល់ជ័យជំនះម្តងទៀតជាលើកទី៣ ជាប់ៗគ្នាទៅគណបក្សប្រជាធិបតេយ្យ ។ នៅក្នុងចំនួនកៅអីទាំងអស់៧៨កៅអី ៥៤ បានទៅគណបក្សប្រជាធិបតេយ្យ. កៅអី ១៨បានទៅគណបក្សសេរីភាព និងកៅអី៦ បានទៅគណបក្សឯកឆ្ន័ន្ទ(លើកនេះតំណាងរាស្ត្រគណបក្សប្រជាធិបយេត្យដែលមាននិន្នាការខាងឆ្វេងនិយម កាន់តែមានចំនួនច្រើនឡើង ព្រោះមជ្ឈមណ្ឌលបោះឆ្នោតខ្លះស្ថិតនៅក្រោមឥទ្ធិពលយួនយៀកមិញ និងខ្មែរយៀកមិញ) ។

ថ្ងៃទី១២ តុលា ១៩៥១ រដ្ឋាភិបាល ហ៊ុយ កន្ធុល បានទទួលសេចក្តីទុកចិត្តពីរដ្ឋសភា ។ ចាប់តាំងពីនោះមក ការប្រឆាំងគ្នារវាងនីតិបញ្ញត្តិ និងនីតិប្រតិបត្តិ ក៏បានចាប់ផ្តើមសាជាថ្មីឡើងទៀត ជាហេតុឱ្យច្របូលច្របល់កាន់តែខ្លាំងឡើង ។ ព្រះរាជបិតា និងព្រះរាជមាតានៃស្តេចសីហនុ បានខំប្រឹងពន្យល់ព្រះរាជបុត្រថា ក្នុងកាលៈទេសៈដ៏ពិបាកនេះ មានតែលោក សឺន ង៉ុកថាន់ ម្នាក់គត់ជាអ្នកកណ្តាលដែលជាអ្នកជដែក

តទៅលេខក្រោយ

# ឪពុកស្និទ្ធស្នាលជាមួយកូន ធ្វើឱ្យកុមារមានបញ្ញាស្មារតីល្អ

ក្មេងដែលស្និទ្ធស្នាលជាមួយឪពុកជាលទ្ធផលស្រាវជ្រាវបានបញ្ជាក់ថា គឺអាចសម្របខ្លួនជាមួយមិត្តភ័ក្តិបានល្អជាងក្មេងដែលគ្មានឪពុកចាប់អារម្មណ៍ ឬដែលមានតែម្តាយថែរក្សា ។

ការស្រាវជ្រាវបានរកឃើញទៀតថា សម្ព័ន្ធភាពដ៏ល្អជាមួយឪពុកនឹងធ្វើឱ្យមានភាពយូរអង្វែងដល់ជីវិតរបស់កូនក្នុងរយៈពេល២ទសវត្សក្រោយ ។

លោកស្រី អេនណាសាកាឪ មកពីមហាវិទ្យាល័យ អាប់សាឡា ប្រទេសស៊ុយអែត បានបង្ហើបថា ការវិភាគលើរបាយការណ៍ដែលរៀបចំធ្វើឡើងក្នុងរយៈពេល២០ឆ្នាំកន្លងមកឃើញថា ជាទូទៅក្មេងនឹងបានឃើញប្រយោជន៍ផ្នែកបញ្ញាស្មារតីច្រើន បើសិនជាពួកគេស្ថិតនៅជិតដិតជាមួយឪពុក ឬអ្នកដែលមានតួនាទីប្រៀប ដូចជាឪពុកដោយក្មេងទាំងនេះមិនបង្កបញ្ហាផ្លូវចិត្តដល់អ្នកផង ហើយថែមទាំងរៀនពូកែអាចបង្កើតមិត្តភាពជាមួយមិត្តភ័ក្តិទាំងពីរភេទបានល្អទៀតផង ។

អ្នកស្រាវជ្រាវស៊ុយអែតបានប្រទះឃើញថា ក្មេងដែលមានឪពុកម្តាយនៅជួបជុំគ្នាមានបញ្ហាច្រើនជាងក្មេងដែលនៅជាមួយតែម្តាយ ។ ក្រៅពីនោះ មានភាពស្និទ្ធស្នាលជាមួយទាំងឪពុក និងម្តាយថែមទាំងធ្វើឱ្យក្មេងប្រុសមានបញ្ហាឈ្លាសវៃ និងមានការបង្កបញ្ហាផ្លូវចិត្តតិចតួចស្តាល់ពីហេតុផល និងជំនាញផ្នែកភាសាមានភាពរីកចម្រើនច្រើន ។ ការស្រាវជ្រាវខាងលើបានឱ្យដឹងទៀតថា ក្មេងដែលនៅជាមួយឪពុកម្តាយជុំគ្នានឹងមានបញ្ហាទង្វើតិចជាងក្មេងដែលមានម្តាយតែម្នាក់ ។

ទោះជាយ៉ាងណាក៏ដោយយើងមិនអាចបញ្ជាក់បានថាហេតុការណ៍នេះ ក៏ដោយសារតែមានឪពុកមាន ចំណែករួមក្នុងការចិញ្ចឹមកូនដែរ ឬយ៉ាងណា ? ឬក៏ម្តាយអាចចិញ្ចឹមកូនបានល្អព្រោះតែបានទទួលការគាំទ្រពីប្តីនោះឡើយ ៕



តមកពីទំព័រទី ២៥ ## ទាហានរារាំងគណបក្សសង្គ្រោះជាតិ...

ខណ្ឌកាន់តែច្រើន។ លោកបានពន្យល់ប្រាប់ថា "យើងមានកម្លាំងច្រើននៅក្នុងក្រុមប្រឹក្សាទាំងនេះដើម្បីពិនិត្យមើលសកម្មភាពរបស់អភិបាលស្រុកខណ្ឌ ហើយយើងក៏មានសិទ្ធិបង្កើតផែនការអភិវឌ្ឍន៍តាមមូលដ្ឋានដែរ។ ប្រសិនបើនរណាម្នាក់មានបញ្ហាអ្វីមួយយើងអាចកោះប្រជុំពិភាក្សាគ្នា ហើយប្រជាជនអាចស្នើឱ្យមានវេទិកាសាធារណៈដើម្បីពិភាក្សាអំពីបញ្ហាដែលពួកគាត់ជួបប្រទះ"។ លោកបានបន្ថែមថា "កុំឱ្យបាត់សំឡេងឆ្នោតរបស់បងប្អូន"។

បន្ទាប់ពីមានភាពតានតឹងមួយសន្ទុះជាមួយទាហានលោក កឹម សុខា បានបញ្ចុះបញ្ចូលឱ្យក្រុមប្រឹក្សាឃុំសង្កាត់មកពីគណបក្សកាន់អំណាចបោះឆ្នោតគាំទ្រគណបក្សប្រឆាំង។

លោក កឹម សុខា បានសួរថា "តើបងប្អូនដឹងថា ខ្យល់កំពុងបក់តាមផ្លូវណាទេនៅពេលនេះ? ខ្យល់កំពុងបក់មករកគណបក្សសង្គ្រោះជាតិ ហើយបងប្អូនគឺជាតំណាងរបស់ប្រជាពលរដ្ឋ។ ឥឡូវនេះប្រជាជនបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិ ប្រសិនបើបងប្អូនមិនបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិទេ បងប្អូនមិនមែនជាតំណាងរបស់ប្រជាពលរដ្ឋទេ ។ តើបងប្អូនគោរពឆន្ទៈរបស់ប្រជាពលរដ្ឋ ឬឆន្ទៈយួន?"។

លោក សម រង្ស៊ី បានលើកឡើងថា ឥឡូវនេះគណបក្សប្រឆាំងកំពុងកាន់ដៃគ្នាដោយសម្ងាត់ជាមួយមន្ត្រីគណបក្សប្រជាជនកម្ពុជាថ្នាក់ក្រោមជាច្រើនដែលលោកបានមានប្រសាសន៍ថា នឹងបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិនៅថ្ងៃទី១៨ ខែឧសភា។

លោក សម រង្ស៊ី បានមានប្រសាសន៍ថា "យើងរំពឹងថា នឹងឈ្នះឆ្នោតភ្លូកទឹកភ្លូកដី។ មិនថា បងប្អូនគាំទ្រគណបក្សណាទេ យើងសុទ្ធតែខ្មែរទាំងអស់គ្នា។ ក្រុមប្រឹក្សាគណបក្សប្រជាជនកម្ពុជាដឹងខុសដឹងត្រូវពួកគាត់អាណិតប្រទេសជាតិ ហើយពួកគាត់ស្រឡាញ់យុត្តិធម៌ ពួកគាត់នឹងគាំទ្រយើង"៕ **គីមហឿន**
















# KHMERPOST USA 4th ANNUAL GALA

## GOLD SPONSOR :




Our main goal is to help senoir adults live , independent and meaningful life by providing comprehensive and compassionate care in their own homes by our professional care takers, registered nurses who speak their own language .

Call 978-735-4955 to see of you or your love ones are qualified for this free service from MassHealth Group Adults Foster Care Program.

យើងមានគោលដៅក្នុងការជួយសម្រួលការរស់នៅដល់លោកអ្នកវ័យចំណាស់ឱ្យរស់នៅមានសុខភាពល្អ ឯករាជ្យភាព និងមានអត្ថន័យក្នុងជីវិត ដោយផ្តល់នូវតម្លៃតបស្នងនានា និងការថែទាំតាមផ្ទះពីអ្នកជំនាញថែទាំ គិលានុបដ្ឋាយិការ មានគរុកោសល្យ ដែលនិយាយភាសាលោកអ្នក ។

សូមទាក់ទងទូរស័ព្ទ : **978-735-499** សម្រាប់ព័ត៌មានបន្ថែម

**Lowell Office**
144 Merrimack St. Suite 404
Lowell, MA 01852

**Boston Office**
214 Lincoln St. Suite 200
Allston, MA 02134